ខ្មែរប៉ុស្តិ៍
ឆ្នេរខាងកើត
VOL. 05 ISSUE 74 . DEC. 23th – JAN.13th, 2010

# KhmerPost USA
Printing The Cambodian World News

MASSACHUSETTS
- LOWELL
- LYNN
- REVERE
- BOSTON
-PHILADELPHIA
-RODE ISLAND

មាតិការឿង ទំព័រ



## Khmer Post USA, LLC Opening Ceremony in Lowell Massachusetts

•••ភ្ញៀវប្រមាណ៣០០នាក់ បានចូលរួមជាកិត្តិយសដល់ពិធីសម្ពោធវត្តមាន «ខ្មែរប៉ុស្តិ៍» នៅ Lowell រដ្ឋ Massachusetts នៅភោជនីយដ្ឋាន សំពៅមាស កាលពីថ្ងៃទី១៨ ខែធ្នូ ឆ្នាំ២០១០ ។



អង្រ្គា ជា សូមជូនសេចក្តីរាយការណ៍សង្ខេបជាភាសាអង់គ្លេស :

Khmer Post USA, LLC operates its business for five years before expanding the branch to Massachusetts starting the middle of September 2010. Only 3 months period Massachusetts team had brought beyond believe success to Khmer Post USA in quality of news and information for Khmer Community in the East Coast. This success is a combination of the quality of the local news, the collaborations from local businesses, government, institutions, and organizations who support us through aid placing, resource linkages, and most notably, the outreach effort from the local team

*(Continued to page 02)*

## ទិវាបុណ្យកំណើតព្រះយេស៊ូវ Christmas ឬ Noél



**ដោយ ម៉ម យឹន**

ថ្ងៃទី២៥ ខែធ្នូ នៅក្នុងគ្រប់ព្រះវិហារ និងគ្រប់គេហដ្ឋាននៃក្រុមជំនុំគ្រីស្ទបរិស័ទ គេបានរៀបចំតុបតែងលំអដោយភ្លើងពណ៌ចម្រុះដោយផ្កាធំៗ ដោយផ្កាភ្ញី និងដើមគ្រីស្ទម៉ាសលំអដោយភ្លើងពណ៌មានតាំងផ្កាយ១នៅកំពូល ដែលជាសញ្ញាប្រាប់ថា ព្រះយេស៊ូវ បានប្រសូត្រហើយ ហើយមានព្រះ ជន្មគង់នៅអស់កល្ប ដូចជាដើមគ្រីស្ទម៉ាស ដែលរក្សាពណ៌បៃតងជាប់រហូតគ្រប់រដូវគ្មានប្រែប្រួលសោះឡើយ ។

(តទៅទំព័រទី ១៧)

## វត្តត្រៃរតនារាមស្វែងរកទីបញ្ចប់នៃទំនាស់

**ដោយ : ពិន សំនុន**

**ឡូវែល** : ឧបាសក ឧបាសិកានៃវត្តត្រៃរតនារាម ហៅវត្តចាស់ ប្រមាណ ២០០នាក់ បានមកជួបជុំគ្នានារសៀលថ្ងៃអាទិត្យ ទី១២ ខែធ្នូ ឆ្នាំ២០១០ ដោយទឹកមុខរីករាយ បន្ទាប់ពីបានទទួលដំណឹងថាការប្តឹង



ផ្តល់រវាងវត្តក្រោម និងវត្តលើបានត្រូវបញ្ចប់ដោយការយល់ព្រមរួមនៃភាគីទំនាស់ថា "ត្រូវបង្រួបបង្រួមវត្តឱ្យនៅតែមួយឡើងវិញ ក្រោមការទទួលគ្រប់គ្រងដោយគណកម្មាធិការវត្តតែមួយ ដែលទាំងអស់សុទ្ធតែគ្រហស្ថចំនួន ១៣រូប" ។

(តទៅទំព័រទី ០៥)

(Continued from page 01 )

# Khmer Post USA, LLC...

to the community at large, businesses, Buddhist temples, churches, and educational institutes such as, colleges, university, and high schools.

On Saturday, December 18, 2010 Khmer Post hosted a very successful Opening Ceremony in Lowell Massachusetts, at the Sompao Meas Hall with over 250 guests attending. Attending guests included local community members from Lowell, Lynn, Revere, businesses, governmental representatives, group representations from Khmer Machas Srok Organization, Moha Chak Kom

(Continued to page 10)





















# ពិធីបង្សុកូលរំលឹកវិញ្ញាណក្ខ័ន្ធជនរងគ្រោះ និងបុណ្យមរណៈសង្គ្រោះជួយជនរងគ្រោះនៅកោះពេជ្រ

ដោយ : អ៊ុចា អ៊ួង

**ឡូវែល** : ក្រោមអាកាសធាតុដ៏ត្រជាក់ក្នុងសីតុណ្ហភាព ៣៩ºF កាលពីវេលាម៉ោង ៩:00នាទីព្រឹក ថ្ងៃទី ២៧ ខែវិច្ឆិកា ឆ្នាំ២០១០កន្លងទៅស្ថានកុងស៊ុលកិត្តិយសប្រចាំទីក្រុងឡូវែល បាននិមន្តព្រះសង្ឃចំនួន ៣អង្គ បង្សុកូលរំលឹកវិញ្ញាណក្ខ័ន្ធដល់ជនរងគ្រោះដោយឧបទ្ទវហេតុនារាត្រីថ្ងៃទី២២ ខែវិច្ឆិកា ឆ្នាំ២០១០ ដ៏សោកសៅនៅកោះពេជ្រដែលពិធីនោះប្រារព្ធធ្វើនៅទីតាំងមុខស្ថានកុងស៊ុលកិត្តិយស អាគារលេខ 93 Chelmsford street, Lowell, MA 01851 ដែលមានប្រជាពលរដ្ឋខ្មែររស់នៅសហរដ្ឋអាមេរិកប្រមាណជាង ៣00នាក់ចូលរួម ។

លោក អ៊ូ សុវណ្ណ អគ្គនាយកកុងស៊ុលកិត្តិយសបានមានប្រសាសន៍ បងប្អូនប្រជាពលរដ្ឋម្នាក់ៗ បានសំដែងនូវភាពក្តុកក្តួលឥតឧបមា បន្ទាប់ពីបានឃើញរូបភាពនៃការកកស្ទះជាន់គ្នា ធ្វើឱ្យមានអ្នកដួលសន្លប់ ស្លាប់បាត់បង់ជីវិត និងរងរបួសយ៉ាងអណោចអធម្ម ដោយគ្មាននរណានឹងស្មានថា អាចមានហេតុការណ៍សោកនាដកម្មបែបនេះកើតឡើងឡើយ"។ អ្នកចូលរួមទាំងឡាយបានសំដែងការចូលរួមកាន់មរណទុក្ខជាមួយនឹងក្រុមគ្រួសារជនរងគ្រោះនៅឯកម្ពុជាពីចំងាយដោយបានអុជទៀន ធូប ស្មឹងស្មាធរំលឹកវិញ្ញាណក្ខ័ន្ធ និងបួងសួងឧទ្ទិសកុសលផលបុណ្យសូមឱ្យវិញ្ញាណក្ខ័ន្ធរបស់ជនរងគ្រោះទាំងនោះបានទៅសោយសុគតិភព ចំណែកអ្នករងរបួសឆាប់ជាសះស្បើយ និងបួងសួងឱ្យកម្ពុជា ចៀសផុតពីគ្រោះកាចចង្រៃផ្សេងៗ បងប្អូនប្រជាពលរដ្ឋខ្មែរនៅសហរដ្ឋអាមេរិកបានបរិច្ចាកថវិកាចូលរួមចាប់កុសលតាមរយៈស្ថានកុងស៊ុលកិត្តិយសប្រចាំក្រុងឡូវែល ដើម្បីជាការរំលែកបន្ទុកដល់ក្រុមគ្រួសារជនរងគ្រោះដែលបានបាត់បង់បងប្អូន កូនចៅ ប្តីប្រពន្ធ និងអ្នករងរបួស នូវថវិកាសប្បុរសធម៌សរុប ៤000ដុល្លារ និងផ្ញើតាមរយៈក្រសួងការបរទេស និងសហប្រតិបត្តិការអន្តរ-





ជាតិ ជូនកាកបាទក្រហមកម្ពុជា។ ពិធីបានបញ្ចប់ទៅនៅវេលាម៉ោង១២:00 ថ្ងៃត្រង់នាថ្ងៃដដែលបន្ទាប់ពីប្រគេនចង្ហាន់ដល់ព្រះសង្ឃ និងពិសារអាហាររួមគ្នាស្ថិតក្រោមបរិយាកាសសាមគ្គីស្និទស្នាលក្រៃលែង ។

ទោះជាពិធីខាងលើបានបញ្ចប់ទៅហើយក្តី ក៏នៅតាមបណ្តាអង្គការមូលនិធិ និងឥស្សរៈជននយោបាយនានាក្នុងសហគមន៍ឡូវែល បានប្រារព្ធពិធីនៅទីផ្សេងៗដោយមានការអញ្ជើញពីគ្រប់និន្នាការនយោបាយទាំងអស់ សំដែងពីការរួមចំណែក និងអារម្មណ៍ផ្ទាល់ខ្លួន ។

អ្នកស្រី NIKI TSONGAS ដែលជាតំណាងរាស្ត្រទើបតែជាប់ឆ្នោតថ្មីៗ ប្រចាំទីក្រុងឡូវែល បានមានប្រសាសន៍តាមរយៈសារលិខិតរំលែកទុក្ខរបស់គាត់ថា "ខ្ញុំសូមសំដែងនូវការអាណិតអាសូរ និងរំលែកទុក្ខយ៉ាងក្រៀមក្រំចំពោះការបាត់បង់ជីវិតប្រជាជនខ្មែរ ក្នុងព្រឹត្តិការណ៍សោកនាដកម្មរត់ជាន់គ្នា ដែលបានកើតឡើងនៅថ្ងៃចុងបញ្ចប់នៃព្រះរាជពិធីបុណ្យអុំទូកប្រពៃណីជាតិ នាថ្ងៃទី២២ ខែវិច្ឆិកាឆ្នាំ២០១០។ ដូចដែលអ្នកបានដឹង ខ្ញុំមានសំណាងណាស់បានធ្វើជាតំណាងសហគមន៍ខ្មែរ-អាមេរិកាំងដ៏ធំក្នុងទីក្រុងឡូវែល ដែលមានចំណងយ៉ាងជ្រៅចំពោះប្រទេសកំណើតរបស់ខ្លួនពួកគាត់។ ខ្ញុំចូលរួមជាមួយប្រជាជនកម្ពុជាក្នុងការសំដែងនូវការអាណិតអាសូរ និងចូលរួមចំណែកក្នុងការរំលែកទុក្ខចំពោះការបាត់បង់ជីវិតប្រជាជនខ្មែរ។ ចិត្តគំនិតរបស់ខ្ញុំស្ថិតនៅជាមួយក្រុមគ្រួសារខ្មែរទាំងឡាយណាដែលបានជួបប្រទះនូវសោកនាដកម្មនេះ។

រីឯលោក Sam Meas ដែលធ្លាប់ឈរឈ្មោះប្រកួតប្រជែងធ្វើជាតំណាងរាស្ត្រប្រចាំទីក្រុងឡូវែល បានដឹកនាំក្រុមមូលនិធិរបស់ខ្លួនឈ្មោះថា "មូលនិធិសែមមាស" ដែលបានសហការជាមួយអង្គការមូលនិធិសប្បុរសខ្មែរ ចំនួន៦ ប្រចាំក្រុងឡូវែល និងមូលនិធិបុគ្គលិករោងចក្រ Unraped Cooperation ដើម្បីប្រារព្ធពិធីបុណ្យរួមរបស់ខ្លួនមួយនៅសាលសំពៅមាស ហៅថា "បុណ្យមរណៈសង្គ្រោះជួយជនរងគ្រោះនៅកោះពេជ្រ"។ លោក មាស សែម ដែលបានដឹកនាំពិធីបុណ្យនោះ បានមានប្រសាសន៍ថា "ខ្ញុំសូមសំដែងនូវសេចក្តីកាន់ទុក្ខក្រៀមក្រំឥតឧបមាចំពោះសោកនាដកម្មរត់ជាន់គ្នានៅលើស្ពានកោះពេជ្រដែលឈានទៅដល់ការស្លាប់បាត់បង់ជីវិត និងរបួសជាច្រើនរយនាក់កាលពីរាត្រីថ្ងៃបញ្ចប់បុណ្យអុំទូកប្រពៃណីជាតិ ២២ ខែវិច្ឆិកា ឆ្នាំ២០១០ កន្លងទៅ ។ ឥឡូវខ្ញុំនៅតែមានអារម្មណ៍ជិតជាប់ថា ខ្ញុំបានបាត់បង់បងប្អូនខ្មែរយើងជាច្រើននៅឡើយ ហើយកំពុងបាត់បង់បន្តទៅទៀត ដោយសារអ្នកខ្លះបានរងរបួសធ្ងន់ធ្ងរ និងស្លាប់ជាបន្តបន្ទាប់ក្រោយពីឧប្បទ្ទវហេតុនេះ ប្រសិនបើគ្មានការថែទាំ, គាំទ្រ, ជួយព្យាបាលឱ្យបានដិតដល់ទេនោះ។ ក្រុមគ្រួសារខ្ញុំ និងខ្ញុំសូមសំដែងនូវការសោកស្តាយអស់ពីហឫទ័យ ហើយសូមចូលរួមកាន់មរណៈទុក្ខទៅដល់ជនរងគ្រោះព្រមទាំងគ្រួសារទាំងអស់"។

សោកនាដកម្មដែលគួរឱ្យខ្លោចផ្សានេះ បានជំរុញឱ្យប្រជាពលរដ្ឋខ្មែរ ដែលធ្លាប់មានដំណើរជីវិតលំបាកវេទនា ឈឺចាប់ ស្ថិតក្រោមនយោបាយបែកបាក់គ្នាក្នុងផ្ទៃប្រទេស កាលពីទសវត្ស ៧0 ឱ្យមានការចុះសំរុងប្រមូលផ្តុំសាមគ្គីគ្នាឡើងវិញ គួរជាទីមោទនៈ។ នេះជាគំរូល្អដល់សហគមន៍ខ្មែរឡូវែលទាំងមូល ព្រោះយើងទាំងអស់គ្នា មិនត្រឹមតែបើកចិត្តគំនិតឈឺឆ្អាលប៉ុណ្ណោះទេ ថែមទាំងធ្វើសកម្មភាពរួមគ្នាដើម្បីបុព្វហេតុជាតិ និងប្រជាជនខ្មែររួមគ្នាផងដែរ ៕

ពេលវេលា និងម៉ោងផ្សាយកម្មវិធីជាភាសាខ្មែរ

តាមរយៈស្ថានីយ៍ទូរទស្សន៍ប៉ុស្តិ៍លេខ ៨ ក្រុងឡូវែល រដ្ឋម៉ាសាឈូសេត

| ថ្ងៃ Date | ឈ្មោះកម្មវិធី Program | ម៉ោង Time | រយៈពេល Duration |
|---|---|---|---|
| ថ្ងៃច័ន្ទ Monday | ប្រពៃណីខ្មែរ | 12:00 PM | 01:00:00 |
| | សម្លេងខ្មែរ-អាមេរិកាំង | 08:00 PM | 01:00:00 |
| | ជីវិតថ្មី Jivit Thmei | 09:00 PM | 01:00:00 |
| ថ្ងៃអង្គារ Tuesday | ខ្មែរក្រុងឡូវែល | 12:00 PM | 01:00:00 |
| | ខ្មែរភៀសខ្លួន Khmer Refugee | 06:00 PM | 01:00:00 |
| | ជីវិត និង សិល្បៈ Life and Arts | 07:00 PM | 00:30:00 |
| ថ្ងៃពុធ Wednesday | សមាគមខ្មែរ CMAA TV Show | 07:00 PM | 01:00:00 |
| | មនោសញ្ចេតនាខ្មែរ | 08:00 PM | 01:00:00 |
| ថ្ងៃព្រហស្បត្តិ៍ Thursday | បុណ្យអុំទូក | 07:00 PM | 01:00:00 |
| | នាទីសង្គមខ្មែរ | 08:00 PM | 01:00:00 |
| ថ្ងៃសុក្រ Friday | ព្រះពុទ្ធសាសនាខ្មែរ | 12:00 PM | 01:00:00 |
| | Khmer Charisma Live | 05:00 PM | 01:00:00 |
| | ព័ត៌មានវត្ត Temple News | 08:00 PM | 01:00:00 |
| ថ្ងៃសៅរ៍ Saturday | Cambodian Baptist | 03:00 PM | 01:00:00 |
| ថ្ងៃអាទិត្យ Sunday | ដំណើរទៅស្រុកខ្មែរ | 06:00 PM | 01:00:00 |

ពេលវេលា និងម៉ោង ផ្សាយកម្មវិធីជាភាសាខ្មែរ

តាមរយៈស្ថានីយ៍ទូរទស្សន៍ប៉ុស្តិ៍លេខ ៥៥ ក្រុងឡូវែល រដ្ឋម៉ាសាឈូសេត

| ថ្ងៃ Date | ឈ្មោះកម្មវិធី Program | ម៉ោង Time | រយៈពេល Duration |
|---|---|---|---|
| ថ្ងៃច័ន្ទ Monday | Cambodian Baptist | 09:00 AM | 01:00:00 |
| | ខ្មែរភៀសខ្លួន Khmer Refugee | 07:00 PM | 01:00:00 |
| ថ្ងៃអង្គារ Tuesday | ប្រពៃណីខ្មែរ Khmer Tradition | 12:00 PM | 01:00:00 |
| | Khmer Charisma | 03:00 PM | 01:00:00 |
| ថ្ងៃព្រហស្បត្តិ៍ Thursday | ព័ត៌មានវត្ត Temple News | 08:00 PM | 01:00:00 |
| ថ្ងៃសុក្រ Friday | ដំណើរទៅស្រុកខ្មែរ | 02:00 PM | 01:00:00 |
| | ជីវិតថ្មី Jivit Thmei | 07:00 PM | 01:00:00 |
| | មនោសញ្ចេតនាខ្មែរ | 08:00 PM | 01:00:00 |
| ថ្ងៃសៅរ៍ Saturday | ព្រះពុទ្ធសាសនាខ្មែរ | 03:00 PM | 01:00:00 |
| | ខ្មែរក្រុងឡូវែល Khmer Lowell | 04:00 PM | 01:00:00 |
| ថ្ងៃអាទិត្យ Sunday | នាទីសង្គមខ្មែរ Khmer Talk | 12:00 PM | 01:00:00 |
| | សមាគមខ្មែរ CMAA TV Show | 01:00 PM | 01:00:00 |
| | បុណ្យអុំទូក | 05:00 PM | 01:00:00 |
| | ជីវិត និងសិល្បៈ Life and Arts | 06:00 PM | 00:30:00 |
| | សម្លេងខ្មែរ-អាមេរិកាំង | 07:00 PM | 01:00:00 |

ពេលវេលា និងម៉ោងផ្សាយកម្មវិធីជាភាសាខ្មែរ

តាមរយៈវិទ្យុ **WUML - 91.5 FM** ក្រុងឡូវែល រដ្ឋម៉ាសាឈូសេត

| វិទ្យុសំឡេងកុលបុត្រខ្មែរ Voice of Cambodian Children | វិទ្យុសំឡេងសមាគមខ្មែរ Voice of CMAA-Thinking Out Loud Radio |
|---|---|
| ផ្សាយរាល់ថ្ងៃអាទិត្យ | ផ្សាយរាល់ថ្ងៃសុក្រ |
| ម៉ោង១រសៀល ដល់ម៉ោង៥ល្ងាច | ម៉ោង១១ព្រឹក ដល់ម៉ោង១២ថ្ងៃត្រង់ |

# Three Cupa of Tea
# ទឹកតែ៣ពែង



**(តពីលេខមុន)**
**ដោយ : គឹមភឿន**
**សរសេរតាមលំនាំរឿងពិត**

អ្នកមានទ្រព្យមហាសាលនោះឈ្មោះ ជីនហ៊ៀកនី (Jean Hoerni) គាត់ជាអតីតអ្នកឡើងភ្នំម្នាក់ ហើយជាអ្នកវិទ្យាសាស្ត្រផង ហើយបានយកចិត្តទុកដាក់យ៉ាងខ្លាំងចំពោះគម្រោងសាងសង់សាលានេះ។ គាត់ជាមនុស្សពិបាកទាក់ទងណាស់ តែសំណាងល្អគ្រែក បានគាត់ទាក់ទងដោយទូរស័ព្ទមកសួរត្រង់ៗដោយពាក្យកំបុតៗ "ថាមើលតើលោកត្រូវការប៉ុន្មានដើម្បីសាងសង់សាលារៀនលោកឱ្យបានសម្រេច?" ។ គ្រែករៀបរាប់ជំរាបទៅវិញ : " ខ្ញុំបានជួបពិភាក្សាជាមួយស្ថាបត្យករ និងក្រុមអ្នកសាងសង់ ដោយខ្ញុំចង់សង់សាលានេះឱ្យមាន៥បន្ទប់ បន្ទប់៤សម្រាប់ធ្វើថ្នាក់រៀន មួយបន្ទប់ទៀតសម្រាប់..." លោកហ៊ៀកនីកំហោកមកវិញ: "ខ្ញុំត្រូវការតែតួលេខពិតប្រាកដ!" ។ គ្រែកតបមកវិញដោយអាក់អន់ចិត្តបន្តិចផង :" មួយម៉ឺនពីរពាន់ដុល្លារ តែលោកអាចជួយបានប៉ុន្មានក៏តាមចិត្តស្ម័គ្ររបស់លោកចុះ" ។ សម្លេងសួរមកវិញយ៉ាងកំបុតៗ "លោកអាចសង់សាលារៀនមួយដោយត្រូវការប្រាក់ឧបត្ថម្ភតែមួយម៉ឺនពីរពាន់ដុល្លារ?" ។

មួយអាទិត្យក្រោយមកមូលប្បទានប័ត្រ ១២.០០០ដុល្លារបានមកដល់ដៃគ្រែកភ្ជាប់មកជាមួយនឹងក្រដាសមួយសន្លឹកដែលសរសេរខ្សៀកថា "កុំត្បិតត្បៀតពេក" ដោយក្តីរាប់អានពីខ្ញុំ JH (ជីនហ៊ៀកនី) ។ បានន័យថា គ្រែកមានលុយអាចសង់សាលាបានហើយ ។

ប៉ុន្តែគេនៅត្រូវការសោហ៊ុយធ្វើដំណើរទៅកាន់ប្រទេសប៉ាគីស្ថាន និងចំណាយផ្សេងៗថែមទៀត គេចាប់ផ្តើមលក់របស់របរដែលគេមានជាប់នឹងខ្លួនគេ ដូចជាសៀវភៅនិយាយពីកិច្ចការឡើងភ្នំ. សៀវភៅដែលមានតម្លៃនឹងកម្ររកបានដែលឪពុកគេបានបន្សល់ទុកមកឱ្យ។ បន្ទាប់មកគេលក់នូវប្រដាប់ប្រដាសម្រាប់ឡើងភ្នំទាំងអស់ ចុងក្រោយគេលក់នូវរថយន្តដែលជារបស់ដែលគេត្រូវការជាចាំបាច់បំផុតក្នុងជីវិតរបស់គេ។ ក្រោយពេលដែលលក់សឹងតែអស់ពីខ្លួនគ្មានសល់អ្វីនោះ គ្រែកក៏ឡើងតាក់ស៊ីតម្រង់ព្រលានយន្តហោះក្នុងដំណើរទៅកាន់ប្រទេសប៉ាគីស្ថាន។

វគ្គទី៦ ផ្លូវដ៏លំបាកទៅកាន់ទីដៅពេលដែលទៅដល់ទីក្រុងរ៉ាវ៉ាល់ពិនឌីភ្លាម គ្រែកតម្រង់ទៅជួលបន្ទប់ដែលមានតម្លៃថោកបំផុតនៅក្នុងសណ្ឋាគារដដែលគេបានស្នាក់នៅពីលើកមុនក្នុងដំណើរទៅឡើងភ្នំ K2 ។ មុននឹងធ្វើដំណើរទៅកាន់ភូមិកប្តិគេត្រូវការទិញឱ្យបានសព្វគ្រប់នូវគ្រឿងសំណង់ដែលគេត្រូវការសង់សាលារៀនមាន៥បន្ទប់នោះឱ្យហើយជាមុនសិនកុំឱ្យលំបាកត្រឡប់ក្រោយមកទិញសារជាថ្មីម្តងទៀត។

គាប់ជួនពេលនោះបុគ្គលិកគ្រប់គ្រងសណ្ឋាគារឈ្មោះ Abdul Shas (អាប់ឌុលសាស) ដែលគ្រែកធ្លាប់ស្គាល់គ្នាពីមុនមក បានស្រែកសួរគេដោយរីករាយនៅពេលគេក្រោកពីគេងនៅព្រឹកដំបូង : "ឱលោកគ្រែក ខ្ញុំចង់សួរលោកថា ហេតុអីបាននាំលោកឱ្យត្រឡប់មកវិញម្តងទៀតនៅទីនេះ?" គ្រែកសប្បាយរីករាយដោយបានជួបនឹងអ្នកស្គាល់ចាស់ក៏ប្រញាប់ឆ្លើយ : "ខ្ញុំត្រឡប់មកសង់សាលារៀនមួយណាំលោកអាប់ឌុល!" ។ ក្រោយពីឆ្លើយសំនួរនោះរួចហើយ គ្រែកក៏ចាប់ផ្តើមរៀបរាប់ពីហេតុការណ៍ដែលគេមានគ្រោះថ្នាក់ស្ទើរបាត់បង់ជីវិតពីគ្រាមុន ដែលគេបានអ្នកស្រុកកប្តិជួយយកអាសារ ហើយគេចង់សងគុណអ្នកស្រុកដ៏ល្អទាំងនោះដោយត្រឡប់មកសាងសង់សាលារៀនមួយខ្នងឱ្យកូនចៅអ្នកស្រុកបានរៀនសូត្រស្រួលបួលនឹងគេ។

លោកអាប់ឌុល សម្លឹងគេពីក្បាលដល់ចុងជើងដែលគ្របដណ្តប់ដោយខោអាវប្រពៃណីនៃអ្នកស្រុកប៉ាគី ស្ថាន ដែលរហែក និងកញ្ចាស់ឈ្មោះ សាល់វ៉ារកាមីស ធំទូលាយទ្រលុងឃុង ជើងពាក់ស្បែកជើងបាតាមួយគូដែលចាស់មើលមិនយល់។ អាប់ឌុល ក៏សួរដោយងឿងឆ្ងល់? លោកមានទ្រព្យសម្បត្តិស្តុកស្តម្ភណាស់មែនទេ? " គ្រែកឆ្លើយដោយប្រញាប់ប្រញាល់ : "មិនមែនទេ!" ។ រួចហើយគាត់បានពន្យល់ថា មនុស្សម្នាច្រើនណាស់នៅសហរដ្ឋអាមេរិកបានបរិច្ចាគប្រាក់កាស់ទាំងនេះដើម្បីបំពេញគោលបំណងរបស់គាត់ ក្នុងនោះមានទាំងសិស្សសាលាផង។ និយាយចប់ភ្លាមគ្រែកក៏បង្ហាញនូវកញ្ចប់នីឡុងពណ៌បៃតងមួយដែលគេសម្រាប់ដាក់ខោអាវ ហើយបាននិយាយថា : ក្នុងនេះមានចំនួនគ្រប់គ្រាន់អាចសង់សាលារៀនមួយបានហើយ ខ្ញុំខំប្រយ័ត្នប្រយែងសន្សំសំចៃខ្លាំងណាស់" ។ អាប់ឌុល ដើរតាមក្រោយគ្រែកហើយនិយាយថា:"ដោយក្តីអាណិតអាសូរពីព្រះអាឡាដ៏មានបុណ្យ យើងនឹងនាំគ្នាជួយគិតគូរពីរឿងនេះគិតគូរយ៉ាងល្អិតល្អន់បំផុត" ។

ក្រោយមកពីរបីថ្ងៃលោក អាប់ឌុល ក៏បានជួយដើរទិញបានគ្រប់សព្វនូវគ្រឿងសំណង់សម្រាប់សាងសង់ទាំងអស់ដូចជាឈើជ្រុង, ស៊ីម៉ង់ត៍, ដែកគោល, រណារ, ញញួរ, ចបកាប់, ចបជីក, ពូថៅ, បន្ទះស័ង្កសីម្រាប់ប្រក់ដំបូល ។ល។ ពេលចៅកែហាងគិតថ្លៃ គេគិតក្នុងតម្លៃថ្លៃបំផុត។ លោកអាប់ឌុល ខំតថ្លៃឱ្យចុះមកយ៉ាងទាបទាល់តែគ្រែក អាចទទួលយកបាន។ **(សូមរង់ចាំអានជាបន្តនូវលេខក្រោយ)**

# FELS HIGH SCHOOL CLOSED DUE TO ARMED GUNMAN NEARBY

ពុំទាន់មានសញ្ញាណាមួយដែលថា ជនសង្ស័យនោះ ធ្វើការបម្រាមអ្វីដល់វិទ្យាល័យនោះនៅឡើយទេ តែសាលារៀនបានសំដែងការត្រៀមប្រុងប្រយ័ត្នកុំឱ្យឱ្យប្បត្តិហេតុអាក្រក់ណាមួយអាចកើតឡើង។

The School District of Philadelphia

Philadelphia, PA—All students and staff of Samuel S. Fels High School are being routed to another location today—December 22nd—due to a police situation involving an armed gunman who has barricaded himself into a building nearby. Buses are taking students to Laura H. Carnell Elementary School (1100 Devereaux Avenue) and parents are being notified of the situation.




While there is no indication that the gunman has made any threats directly towards the school, District officials feel that the close proximity of the situation to the school building warrants these steps in order to ensure the safety of students and staff. Fels High principal Eileen Coutts will still be at the school taking calls from concerned parents throughout the day.

# Speculations on the lethal stamped in Phnom Penh, Cambodia

•••ក្នុងគ្រោះមហន្តរាយនៅលើស្ពានពេជ្រ កាលពីថ្ងៃ២២ ខែវិច្ឆិកា ឆ្នាំ២០១០នេះ មានការបង្ហាញព្រឹត្តិការណ៍ស្រពិចស្រពិលបន្លំភ្នែកច្រើនអន្លើដែលព្រឹត្តិការណ៍ដ៏ធំចំបងមួយនេះក្លាយទៅជាពុំបានជាមេរៀនអ្វីសោះដល់ប្រជាជាតិខ្មែរ ។ អគ្រោជា សូមជូននៅការពិចារណាដ៏ជ្រាលជ្រៅមួយ ជួយជម្រះមន្ទិលសង្ស័យដោយប្រើបច្ចេកទេសដែលប្រទេសជាច្រើនធ្លាប់បានអនុវត្តន៍ប្រកបដោយជោគជ័យរួចទៅហើយ :

**ពាក្យចចាមអារាម :**

មានខ្លះថា មកពីឆក់ខ្សែភ្លើង អ្នកមើលក្រុមសិល្បៈជូរមុខ ខ្លះថា មានមនុស្សច្រើនហួសចំណុះ ធ្វើឱ្យមានការឆក់ខ្សែភ្លើង ហើយជាន់គ្នាពេលស្ទូន់ស្ទោ-ខ្លះទៀតថា ភាពស្ទូន់ស្ទោផ្តើមលើស្ពានបណ្តាលឱ្យមានអ្នកភ័យរត់ជាន់គ្នា-លោក ហ៊ុន សែន ថា"គ្រោះថ្នាក់នេះបណ្តាលមកពីការមិនប្រយ័ត្នទាំងអស់គ្នា" ហើយខ្លះថា មានអរក្សអ្នកកាច់ ព្រោះមិនបានសូត្រមន្តប្រោះព្រំពេលបើកឱ្យប្រើស្ពាននេះ...។

**ដំណោះស្រាយ :**

**១**-ត្រូវបង្កើតគណកម្មាធិការស៊ើបអង្កេតគ្រោះមហន្តរាយនោះ ពីព្រោះយ៉ាងហោចណាស់ក៏មានរដ្ឋាភិបាល នឹងក្រុមអភិវឌ្ឍន៍តំបន់កោះពេជ្រអាចជាអ្នកទទួលខុសត្រូវក្នុងការខនខានពុំបានការពារកុំឱ្យគ្រោះភ័យមហន្តរាយនេះកើតឡើងបាន។ **២**-រដ្ឋាភិបាលបានប្រកាសផ្តល់ជំនួយ១២២៧ដុល្លារ បូកនឹងក្រុមកាកបាទក្រហម១០០០ដុល្លារ ក្នុងគ្រួសាររងគ្រោះម្នាក់ៗក្រោយមកផ្តល់ជំនួយ១២០០០ដុល្លារក្នុងគ្រួសារអ្នករងគ្រោះនីមួយៗ។ **៣**-សាធារណៈជនទាមទារឱ្យមានសង់វិមានសម្រាប់រំលឹកវិញ្ញាណក្ខន្ធជនរងគ្រោះ។ **៥**-សហគន៍ខ្មែរក្រៅប្រទេសរៃលុយសម្រាប់ជួយដល់អ្នករងគ្រោះយ៉ាងគគ្រឹកគគ្រេង។

***ចំណុចដែលគួរពិចារណា***

**១**-រដ្ឋាភិបាលខ្មែរ គួរតែងតាំងអង្គការឯករាជ្យដែល ត្រូវតាមដានពិនិត្យភាពគ្រោះថ្នាក់នៃគំរោងសំណង់នីមួយៗឱ្យនឹកពីសុវត្ថិភាពសាធារណៈ ឱ្យធ្វើច្បាប់ឱ្យយន្តការទទួលខុសត្រូវពីអ្នកសង-អ្នកបច្ចេកទេសអ្នកធ្វើគំរោងទទួលខុសត្រូវ។ល។ ស្ពាននីមួយៗត្រូវតែធ្វើការសាកល្បងគួរនឹងអនុញ្ញាឱ្យប្រើប្រាស់...។ **២**-រដ្ឋាភិបាលឬឯកជនគួរចាប់ផ្តើមធ្វើការសាកល្បងវិធីការពារ នៅពេលគ្រោះភ័យអាសន្នកើតឡើង។ ហើយបង្ហាត់បង្រៀនពលរដ្ឋឱ្យយកវិធីការពារខ្លួនទៅប្រើពេលមានអាសន្នមកដល់។ **៣**-ជ្រើសយកមនុស្សដែលមានជំនាញពិតប្រាកដក្នុងវិជ្ជាទប់ស្កាត់មហន្តរាយ






មកបង្ហាត់បង្រៀនជាសាធារណៈ ដើម្បីឱ្យមានជំរើសច្បាស់លាស់។ **៤**-បង្កើតក្រុមជំនួយជាបន្ទាន់ដែលពុំមែនជាក្រុមប៉ូលិស ឬយោធាតែជាអ្នកស្ម័គ្រចិត្ត។ **៥**-បង្កើតគំនិតសង្គ្រោះបន្ទាន់ជាគន្លឹះសម្រាប់ជួយ ។ **៦**-នៅពេលមានពិធីសាធារណៈដែលចេញអាជ្ញាប័ណ្ណឱ្យត្រូវតែជាមនុស្សដែលគេមានជំនឿទុកចិត្តគ្រប់គ្រាន់ពីសមត្ថភាពបច្ចេកទេសដែលអាចឱ្យមានការគ្រោះថ្នាក់ ។ **៧**-ហើយនៅមានសប្បុរសជនដែលមានចិត្តសទ្ធាជ្រះថ្លា សូមឱ្យពិនិត្យដល់សុភាសិតខ្មែរដែលរំលឹកថា "ឱ្យប្រយ័ត្នត្រីងៀតឆ្អៀតពងឬក៏"បង្ហាត់ឱ្យចេះស្ទូចត្រីប្រសើរជាងឱ្យត្រី១សម្រាប់រស់១ថ្ងៃ"ឬ"ក៏កុំជឿលើមនុស្សឃ្លានថាអាចវាយយកបាយឱ្យមកអ្នកបាន"។

**ចំណីសម្រាប់អារម្មណ៍**

ស្ពានពេជ្រជាស្ពានទើបនឹងសង់ហើយថ្មីៗពុំមានដំណឹងថា ស្ពាននេះបានទទួលការពិសោធន៍សមត្ថភាពស្ពានមុននឹងដាក់ឱ្យប្រើប្រាស់ជាសាធារណៈនោះទេ ។ រដ្ឋាភិបាលមិនគួរអនុញ្ញាត្តិឱ្យមានមនុស្សរហូតដល់៧-៨រយនាក់នៅពេលជាមួយគ្នា លើស្ពាននោះទេ។ ស្ពាន MEMIRIAL Bridog នៅ Boston បានត្រូវគេយកដំរី១៤ក្បាលឱ្យដើរសាកពីលើដើម្បីពិសោធន៍ថា ស្ពានអាចទទួលទម្ងន់១១២ពាន់ផោនបាននាថ្ងៃ១៤តុលា ឆ្នាំ២០០៥វិធីពិសោធន៍នេះ ជាប្រពៃណី ដែលបានធ្វើនៅឆ្នាំ១៨៧៤ លើស្ពាន Eads Bridge ឬនៅស្ពាន Brocklyn Bridge នាឆ្នាំ១៨៨៤។

•••There has been much speculation on the lethal stamped in Phnom Penh, Cambodia, happened on November 22, 2010, during the marking of the Water festival celebration. The stamped happened mainly on the new bridge connecting Phnom Penh to Diamond Island that killed 351 and injured hundreds of thousands of concert goers and people attended festival who surge across this bridge.

**The rumor speculations:**

**1)** Electrical wire spark at the front o f the concert stage that electrocute concert goers caused the crow to push back-ward and created stamped. To control the crow the fire fighter spayed water into the river of people that increase electrocution and growing force of stamped.

**2)** The human capacity was over the limit, about 10 people found unconscious. The incident caused fear and panic among the concert goers that lead to stamped.

**3)** The panic started on a bridge fearing electricity running through fallen wires.

**4)** Hun Sen commented, "The incident happened because of carelessness." Government didn't expect this "thing" to happen.

**5)** Superstition over the new bridge being cultivated by raw evil spirit, as the bridge should be bless with holy water by the monks before open to public use.

**Resolutions:**

**1)** A committee was set up to investigate the disaster. Committee members included the ruling party (CPP) and the developer of the Diamond Island, the "Overseas Cambodian Investment Corporation (OCIC). The two groups could be blamed for their handling of the incident.

**2)** Preliminary investigation found the swaying of the Diamond gate bridge triggered panic. Between 7,000 to 8,000 people thought to have been on the bridge at time.

**3)** Initially, Cambodian government-plan to compensate $1,227 U.S. dollars and OCIC $1,000 U.S. dollars to family of each victim. Later the cost of each human life spiraled up to $12,000 U.S. dollars per family of the victim. This was influent by the royal family and "informal compensation schemes and televised call- in donation from the public."

**4)** Cambodian public and families of the victims requested the government have OCIC build memorial on Diamond Island dedicating to the victims of the tragic stamped.

**5)** Cambodian overseas reacted over whelmingly and drastically to the tragic event of the stamped. They put in effort to raise fund to assist the injured and the deceased victims' families.

**Points to consider:**

**1)** Cambodian government can man date and offer accessible resources to the following individuals, government con tractors, engineers, developers, project and construction management firms, risk and public safety professionals, and goverment officials and policy makers to a "Mitigating disaster through design and construction: Planning and building for resiliency" conference. The conference is a two days event on 02-03 March 2011, in the United State of America, at Renaissance Washington DC Dupont Circle Hotel. This conference organzed by Engineering News-Record (ENR). To register online: http://construction.com/events/2011/mitigationdisaster/

**2)** Public and private sectors in Cambodia should increase or start a planning and create emergency respond techniques and protocols in handling crisis situations and incidents for urban, rural, and remote communities in Cambodia. Use the two famous social media, television and radio programs, and school system to help educate and raise safety responds awareness.

**3)** Develop Emergency Service Unit (ESU) that offer multi-faceted and multi-talented element within municipal, county, and province authority Law enforcement-agency's special operations command.

**4)** Select "only" the highest level of physical agility and members who must maintain good personal health who can meet the crisis challenges of tactical situation- not those individuals who only want to show up after the crisis and display disgraceful images of incompetency pretending to examine the incident area without critical thoughts or considerable respect to the injured or deceased victims and their families, as demonstrated in the enclosed picture.

**5)** Recruit non-law enforcement agency based municipal, county, or non-govern ment entity and volunteer groups located in both urban, rural, and remote areas to form an ESU swat team. Because they are non-professional in the rescue work, create an emergency response situation as a demo. model for practice to build skills and ability to handle incidents in major public events.

**6)** Develop key rationale for the integration of the functions that many rural and remote communities do not have. Dedicate the staffing, resources, and infrastructure to sustain immediate 24/7 emergency response for the purpose of human security in conflict and emergencies.

**7)** In any event, when the public affair is being held, the host of the event and the authority agency who issued the permit or license to operate should be held accountable and responsible for any unforeseen damage, loss, and tragic that may occur.

**8)** The kind public overseas who pledge donation to Cambodia (outside of professional-non-license context) should reflect on the following Khmer proverbs:

**A.** "Dried salted fish seek opportunity to lay eggs." (Refer to individuals who are opportunist, seeking unfortunate tragic event and situation of others for own gain, especially for financial and fame purposes.

**B.** "Give a man a fish, feed him for a day. Teach a man to fish, feed him for life." (Refer to donor who gives to people with life challenge situations and circumstances who rely on other's pity and contribution. The proverb reminds givers to be wise with their giving, which is to provide skills that offer life sustainability in stead of a one time cause benefit.

**C.** "Don't trust a hungry man to deliver your rice." (Refer to a man who is desti tute and in need to fulfill his craving. This craving could be for personal gain or benefit.

**Food For Thought:**

Diamond Bridge just newly completed with its construction. It was put to use for the first time at the Cambodian Annual Water Festival in November 2010. There is no mentioned it has been tested for safety, security, and readiness to use by the public. The government should not have allows it to be use under such capacity of 7,000 to 8,000 spectators at time. Leonard P. Zakim Bunker Hill Memorial Bridge in Boston, Massachusetts completed its construction in 2002. On 14 October 2002 the governor of the state, the developer and construction team allow demonstration of the bridge's structural integrity to put to test by using 14 elephants marched the bridge to prove that the bridge can supports up to 112,000 pounds. According to folklore, elephants are used for such shows of strength because they are widely believed to have uncanny instincts and will not cross unsafe structures. Other bridges in the U.S. that use elephants to test as demonstration of sturdiness included, Eads Bridge in 1874 and the Brooklyn Bridge in 1884.

# តើក្រមង៉ុយជានរណា?

**ដោយ អ៊ុច លៀច**

ព្បិតមនុស្សឥឡូវ យកខុសជាត្រូវ យកឆ្កួតធ្វើជា
អំពើអាក្រក់ ឡិកឡក់លីលា ព្រហើនពារលារ
អាងមាសអាងប្រាក់ ។
អាងព្រើលអាងប្រាជ្ញ អាងកោងអាងកាច អាងកាប់អាងចាក់
អាងដៃអាងជើង អាងទាត់អាងធាក់ អាងគុកអាងច្រវ៉ាក់
អាងម៉ាស៊ីនកាត់ក ។

ទាំងអស់នេះជាពាក្យកាព្យប្រៀនប្រដៅរបស់កវី និងជាអ្នកប្រាជ្ញអក្សរសាស្ត្រខ្មែរ «ក្រុមង៉ុយ»ដែលត្រូវបានពលរដ្ឋខ្មែរគ្រប់ៗជំនាន់ចាត់ទុកថា ជាកវីប្រកបដោយវោហាស័ព្ទដែលពិបាកនឹងរកកវីដទៃឯណាមកមកប្រៀបផ្ទឹមបានឡើយ ។ ទោះបីជាអាយុកាលនៃកំណាព្យកាព្យឃ្លោងរបស់លោកបានកន្លងដ៏យូរឆ្នាំណាស់មកហើយក្តី តែរាល់ពាក្យពេចន៍ស្ទើរតែអស់ហាក់មិនចេញហួសសម័យ ដែលគួរតែជនានុជនខ្មែរគ្រប់ៗរូបអាចយកជាគតិសម្រាប់ទូន្មានខ្លួនបាន ។ ក៏ប៉ុន្តែនៅត្រង់ឃ្លាខ្លះហាក់មានការហួសសម័យកាល ដោយពុំមានការប្រតិបត្តិទៀតឡើយសម្រាប់ស្ត្រីខ្មែរនាសម័យបច្ចេកវិជ្ជាវិទ្យាសាស្ត្រនេះ ដែលលោកតា «ក្រុមង៉ុយ» បានប្រៀបប្រដៅដល់ស្ត្រីខ្មែរឱ្យខំរៀនត្បាញក្រណាត់គ្រប់ប្រភេទប្រយោជន៍សម្រាប់កាត់កែច្នៃធ្វើជាសម្លៀកបំពាក់តាមតម្រូវការជាជាងទិញពីផ្សារ ដែលកាព្យនេះមានខ្លឹមសារទាំងស្រុងថា :

រៀនថ្ករវើនត្បាញ ឱ្យចាស់បង្ហាញ បង្ហាត់ទាំងអស់
សំពត់បែបងាយ លាយសូត្រអំបោះ កុំទិញគេសោះ
ឈ្មោះការជាស្រី ។
ទិញជូវថៃល័ក្ខណ៍ អញ្ចុលចេសចាក់ ព្រហូតជាបី
ធ្មេញឈើឈ្នាន់ផ្សំ ក្ដារមូរក្ដារកី ត្រល់ខ្នាឫស្សី
មុខប្ដីជាប្រុស ។

លោកតាមក្រមង៉ុយ ដែលមាននាមដើមជា អ៊ុក-អ៊ូ ឬមានឈ្មោះម្យ៉ាងទៀតជា ភិរម្យ ង៉ុយ និងមានគោរម្យងារជា «ព្រះភិរម្យភាសា អ៊ូ»ត្រូវបានអ្នកនិពន្ធ ឬអ្នកចងក្រងឯកសារពុំបានបញ្ជាក់អំពីកាលបរិច្ឆេកនៃថ្ងៃកំណើតរបស់លោកឡើយ ប៉ុន្តែគេគ្រាន់តែបានដឹងថា លោកប្រសូត្រនៅឆ្នាំ ១៨៦៥ នៅភូមិព្រៃអណ្តូងស្វាយ ឃុំកំពូល ស្រុកភ្នំពេញ ដែលសព្វថ្ងៃត្រូវបានប្តូរមកជាស្រុកអង្គស្នួល ក្នុងខេត្តកណ្តាល ។ គេនៅពុំបានដឹងអំពីសាវតាថា លោកមានបងប្អូនប៉ុន្មាននាក់ឡើយ ដោយគេគ្រាន់តែបានជ្រាបថា លោកតាង៉ុយ ជាកូនទី២ ក្នុងត្រកូលថ្នាក់មធ្យមម្នាក់តែប៉ុណ្ណោះ ។ ចៅពញាធម្មធារា អ៊ុក ដែលជាមេឃុំកំពូលនាគ្រានោះ និងលោកយាយនាម អេង ជា បុត្ររបស់ចៅពញាម៉ុក មេឃុំស្ពានថ្ម ហើយត្រូវជាបងប្អូនជីទូតមួយលោកតាអ៊ុក គឺជាអ្នកផ្តល់កំណើតដល់កុមារដល់ឈ្លាតវៀងវៃ ក្រុមង៉ុយនេះផង ។ ចំពោះជីវិតស្នេហារបស់កវីដ៏ល្បីល្បាញនេះ ពុំត្រូវបានគេបញ្ជាក់នៅក្នុងឯកសារណាមួយឡើយ ប៉ុន្តែគេគ្រាន់តែបានដឹងថា បន្ទាប់ពីលាចាកសិក្ខាបទរួចមក លោកមានភរិយាឈ្មោះ អ៊ិន និងមានកូនប្រុសចំនួន ៦រូប ដូចជា : ដួង. ចេង. ចា. ចិន. ចុង និង ចៅ ។

តាមការបញ្ជាក់ក្នុងឯកសារមួយបានឱ្យដឹងថា ក្នុងចំណោមកូនទាំងអស់ មានកូនទី៥ដែលមានទេពកោសល្យខាងសំនួនវោហា ហើយក៏ល្បីល្បាញខ្លាំងដែរ គឺអាចារ្យ «ចុង» ដែលជាទំពាំងស្នងឫស្សី ។ ក្រៅពីនោះលោកអាចារ្យ ក្រុមង៉ុយ ក៏មានចៅម្នាក់ទៀត ដែលមានសំនួនវោហាល្បីល្បាញខាងចម្រៀងអាយ៉ៃ ដែលមានរាងស្គម គឺ «នាយស្លឹក» ។ នាយស្លឹក តែងតែឧទ្ទេសនាមច្រៀងអាយ៉ៃថា «ស្រុកខ្ញុំនៅខាងលិចពោធិ៍ចិនតុង កូនអាចារ្យចុង ចៅអាចារ្យង៉ុយ» ។

ក្នុងការប្រើប្រាស់ជីវិតសាមញ្ញជាកសិករក្នុងស្រុកភូមិ តាង៉ុយ បានធ្វើឱ្យអ្នកស្រុកភូមិផងរបងជាមួយមានការគោរពរាប់អាន និងមានប្រជាប្រិយភាពយ៉ាងខ្លាំង ដែលផ្តើមឡើងដោយការសូត្រកាព្យភ្លាមៗ និងសំនៀងសាដៀវដ៏ពិរោះ ដោយបូករួមទាំងចំណេះវិជ្ជាខាងធម៌អារខ្ពង់ខ្ពស់ផងដែរ ។ ទីបំផុត



លោកត្រូវបានតែងតាំងជា «ក្រម» ដែលមានន័យជាវិរៈជនក្នុងការធ្វើទំនាក់ទំនងរវាងរដ្ឋបាល និងប្រជាជនក្នុងឃុំ ។

នៅពេលរដូវរំហើយ ក្រោយពីកិច្ចការជ្រូតកាត់ លោកតាក្រុមង៉ុយ តែងតែទេសរថនាប្រៀនប្រដៅ និងច្រៀងកំណាព្យបន្ទរដោយសំនៀងសាដៀវដ៏ពិរោះអន្លង់អន្លោចពីមភូមិមួយទៅភូមុមួយ ។ សំនួនដ៏ល្បីល្បាញរបស់កវីក្រមង៉ុយ ត្រូវបានលេចឮពីមភូមិមួយទៅឃុំមួយ និងរហូតដល់ទីក្រុង ហើយទំបំផុតត្រូវបានសម្តេចចក្រី ហៅឱ្យទៅច្រៀងថ្វាយសម្តេច ស៊ីសុវត្ថ ហើយសម្តេចអង្គនោះបានពេញព្រះហឫទ័យ និងបានថ្វាយរង្វាន់ជាប្រាក់កាស និងប្រគល់គោរម្យងារជាព្រះភិរម្យភាសា ។

អ្នកភិរម្យភាសាអ៊ូ ហៅង៉ុយ «ក្រុមង៉ុយ» គឺជាគោរម្យងារមួយ ដែលហ្លួងស៊ីសុវត្ថ ប្រទានឱ្យកវីអ៊ុក អ៊ូ ហៅង៉ុយ ដែលបានធ្វើឱ្យកូនខ្មែរបានរស់នៅក្នុងការប្រៀនប្រដៅបែបប្រជាប្រិយ ដែលការរួមបញ្ចូលរវាងពុទ្ធោវាទជាមួយបរិស្ថានសង្គមកិច្ចកម្ពុជានាសម័យកាលថ្មីមួយ ព្រោះប្រជាពលរដ្ឋកម្ពុជា បានបាត់បង់មនូវសេរីភាព និងឥស្សរភាពជាម្ចាស់ប្រទេសដោយសារពួកអាណានិគមបារាំងបានចាប់បង្ខំដាក់នឹមត្រួតត្រា ។

(នៅមានតលេខក្រោយទៀត)

KhmerPost USA, LLC
East Coast Publication

**Pin Samkhon,**
*Publisher & Editor-in-Chief*
Email: pinsamkhon@gmail.com
*Staff Writers:* **Loeum Im, Eda Uong & Audria Chea**

*Contributed Writers:*
**Mam Yin, Kim Phien, Lanica Angpak, & Dannely Sam**
KhmerPostLowell@gmail.com

**Soben Pin**
*Marketing Director*
KhmerPostUSA@gmail.com
**267-253-3947**

**Sophal Meas**
*Branch Manager, New England*
**978-758-8547**

*Design Staffs:*
**Leang Heng & Doch Vuthy**
*Distributor:* **Chharly Young**

~~~~

The Khmer Post, LLC is an independent newspaper that aims to facilitate mass communication among the Cambodian communities, their neighboring communities, and families. We aim to address local, community, and national news; and give an insight into Cambodia & global news. We also strive to bridge the language and cultural gaps and reduce social isolation by publishing in Khmer & English.
It published twice a month in Philadelphia, Pennsylvania.

~~~~

Semimonthly edition subscription is available within the U.S. & Canada at $60.00 and 70 Euros in Europe per year. Money order or check is accepted and made payable to:
U.A.M.G.
P.O. Box 24357
Philadelphia, Pa 19120

~~~~

The Khmer Post has full authorization from Bernard Krisher, the publisher of the Cambodia Daily to reproduce all the articles that are produced by the Cambodia Daily free of charge effective date: 6/19/2009
~~~~

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ជំណឹងប្រែសំរួលពីភាសាអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃសុក្រ ទី១៧ ខែធ្នូ ឆ្នាំ២០១០

# A Year Later, Still No Word On Deportees

BY LUCY JORDAN
THE CAMBODIA DAILY

Almost one year since Cambodia forcibly repatriated 20 ethnic Uighurs to China, prompting international condemnation, the World Uighur Congress on Wednesday said it was gravely concerned about the whereabouts and welfare of the asylum-seekers.

"The Chinese government has disappeared these Uighurs, despite having promised the international community that it would deal with the Uighurs transparently upon return," reads a statement on the organization's website.

The 20 asylum-seekers, including a pregnant woman and two children under 3, were deported to China on Dec 19, 2009, in connection with July 2009 clashes between Uighurs and ethnic Han Chinese in the northwest Xinjiang region that left almost 200 dead.

Human rights observers worldwide condemned the deportation, which went ahead before the Uighurs' claims for asylum could be processed. Cambodia is a signatory to the 1951 UN Convention on the Status of Refugees, which prohibits the repatriation of asylum-seekers who could face persecution.

Foreign Ministry spokesman Koy Kuong yesterday said he had "no idea" where the asylum-seekers were, and that the government had "never" inquired after them following the deportation. He defended the deportation on the grounds that the Uighurs were not refugees.

"We consider them illegal immigrants, and we have to send them back home according to the immigration law," he said.

Kitty McKinsey, spokesperson for the UN's refugee agency, UNHCR, said this was not a valid argument.

"Many countries...that have not signed the 1951 refugee convention use immigration laws instead of the convention, but Cambodia had signed it, and did have an obligation to protect asylum-seekers and refugees," she said.

"That the asylum-seeker process was never allowed to run its course before the refoulement, the forcible repatriation, was a grave violation of international law."

Ms McKinsey and Brad Adams, Asia Director of Human Rights Watch, both said yesterday they had asked the Chinese authorities about the repatriated Uighurs and received no information.

# ប្រទេសចិននៅតែស្ងាត់ស្ងៀម ចំពោះវាសនាជនជាតិភាគតិចវីហ្គួ

ដោយ LUCY JORDAN
THE CAMBODIA DAILY

រយៈពេលជិត១ឆ្នាំហើយ ចាប់តាំងពីប្រទេសកម្ពុជា បានធ្វើមាតុភូមិនិវត្តជនជាតិដើមភាគតិចវីហ្គួចំនួន២០នាក់ ដោយបង្ខំទៅកាន់ប្រទេសចិនវិញ ដែលធ្វើឱ្យមានការថ្កោលទោសពីអន្តរជាតិនោះ អង្គការជនជាតិដើមភាគតិចវីហ្គួពិភពលោកកាលពីថ្ងៃពុធបានលើកឡើងថា ខ្លួនព្រួយបារម្ភជាខ្លាំងអំពីទីសំចត និងសុខុមាលភាពរបស់ក្រុមអ្នកស្វែងរកសិទ្ធិជ្រកកោនទាំងនេះ ។

សេចក្តីថ្លែងការនៅលើគេហទំព័ររបស់អង្គការនេះបានលើកឡើងថា "រដ្ឋាភិបាលចិនបានលាក់ជនជាតិដើមភាគតិចវីហ្គួទាំងនេះ ថ្វីបើមានការសន្យាប្រាប់សហគមន៍អន្តរជាតិថា ខ្លួននឹងដោះស្រាយជនជាតិភាគតិចវីហ្គួទាំងនេះប្រកបដោយតម្លាភាព ក្រោយពេលបញ្ជូនទៅវិញក៏ដោយ" ។

ក្រុមអ្នកស្វែងរកសិទ្ធិជ្រកកោន២០នាក់នេះដែលរួមទាំងស្ត្រីមានគភ៌ម្នាក់ និងក្មេង២នាក់ក្រោមអាយុ៣ឆ្នាំផងដែរនោះ ត្រូវបានបញ្ជូនខ្លួនទៅប្រទេសចិនវិញកាលពីថ្ងៃទី១៩ ខែធ្នូ ឆ្នាំ២០០៩ ក្នុងការជាប់ទាក់ទងជាមួយប៉ះទង្គិចគ្នាខែកក្កដា ឆ្នាំ២០០៩ រវាងក្រុមជនជាតិភាគតិចវីហ្គួ និងក្រុមជនជាតិភាគតិចចិនហាននៅក្នុងតំបន់ស៊ីនជាំងភាគពាយព្យដែលធ្វើមនុស្សជិត២០០នាក់ស្លាប់ ។

ក្រុមអ្នកសង្កេតការណ៍សិទ្ធិមនុស្សនៅទូទាំងពិភពលោកបានថ្កោលទោសការបណ្តេញចេញនេះ ដែលបានធ្វើឡើងមុនការទាមទាររបស់ជនជាតិដើមភាគតិចវីហ្គួ សុំសិទ្ធិជ្រកកោនអាចត្រូវបានដំណើរការ ។ ប្រទេសកម្ពុជាក៏ជាប្រទេសហត្ថលេខីមួយក្នុងអនុសញ្ញាអង្គការសហប្រជាជាតិឆ្នាំ១៩៥១ ស្តីពីឋានៈនៃជនភៀសខ្លួន ដែលហាមប្រាមការបណ្តេញក្រុមអ្នកស្វែងរកសិទ្ធិជ្រកកោនដែលអាចប្រឈមនឹងការធ្វើទុកទោស ។

លោក កុយ គួង អ្នកនាំពាក្យក្រសួងការបរទេសបានថ្លែងកាលពីម្សិលមិញថា លោក "មិនដឹង"ថា ក្រុមអ្នកស្វែងរកសិទ្ធិជ្រកកោនទាំងនោះនៅទីណាទេ ហើយថា រដ្ឋាភិបាល "មិនដែល" បានស៊ើបសួរអំពីពួកគេទេ បន្ទាប់ពីការបញ្ជូនទៅវិញនោះ ។ លោកបានថ្លែងការពារការបញ្ជូនចេញនេះដោយលើកហេតុផលថា ជនជាតិដើមភាគតិចវីហ្គួនេះ មិនមែនជាជនជាតិភៀសខ្លួន ប៉ុន្តែជាជនអន្តោប្រវេសន៍ខុសច្បាប់ដែលគ្មានលិខិតស្នាម ។ លោកបានថ្លែងថា "យើងចាត់ទុកពួកគេជាជនអន្តោប្រវេសន៍ខុសច្បាប់ ហើយយើងត្រូវបញ្ជូនពួកគេត្រឡប់ទៅផ្ទះវិញដោយអនុលោមតាមច្បាប់អន្តោប្រវេសន៍" ។

លោកស្រី Kitty McKinsey អ្នកនាំពាក្យរបស់ទីភ្នាក់ងារទទួលបន្ទុកជនភៀសខ្លួនរបស់អង្គការសហប្រជាជាតិ ហៅកាត់ថា UNHCR បានថ្លែងថា នេះមិនមែនជាការវែកញែកដែលយកជាការបានទេ ។

លោកស្រីបានថ្លែងថា "ប្រទេសជាច្រើន... ដែលមិនទាន់បានចុះហត្ថលេខាលើអនុសញ្ញាស្តីពីជនភៀសខ្លួនឆ្នាំ១៩៥១ ប្រើច្បាប់អន្តោប្រវេសន៍ជំនួសអនុសញ្ញានេះ ប៉ុន្តែប្រទេសកម្ពុជាបានចុះហត្ថលេខាលើអនុសញ្ញានេះរួចហើយ និងមានកាតព្វកិច្ចក្នុងការការពារក្រុមអ្នកស្វែងរកសិទ្ធិជ្រកកោន និងជនភៀសខ្លួន ។ ការបណ្តេញអ្នកស្វែងរកសិទ្ធិជ្រកកោនចេញ ដោយមិនបានបំពេញដំណើរការនៃការទាមទារសិទ្ធិតាមច្បាប់ ពោលគឺការធ្វើមាតុភូមិនិវត្តន៍ដោយបង្ខំគឺជាការរំលោភធ្ងន់ធ្ងរទៅលើច្បាប់អន្តរជាតិ" ។

លោកស្រី Kitty McKinsey និងលោក Brad Adams នាយកអង្គការតាមមើលសិទ្ធិមនុស្សនៅអាស៊ី បានថ្លែងកាលពីម្សិលមិញថា ពួកគេបានសួរនាំអាជ្ញាធរចិនអំពីជនជាតិភាគតិចវីហ្គួ ដែលត្រូវបានធ្វើមាតុភូមិនិវត្តន៍ ហើយមិនបានទទួលព័ត៌មានអ្វីទេ ។

លោក Adams បានថ្លែងថា "ប្រទេសចិនបានធ្វើបាបជនជាតិដើមភាគតិចវីហ្គួ ដែលរិះគន់រដ្ឋាភិបាលចិន ។ មានលទ្ធភាពច្រើនដែលថាពួកគេត្រូវបានកាត់ទោសឱ្យជាប់ពន្ធនាគាររយៈពេលយូរ ហើយអាចត្រូវបានប្រហារជីវិត" ។ អ្នកនាំពាក្យម្នាក់របស់ស្ថានទូតចិនមិនបានឆ្លើយតបនឹងសំណើសុំអត្ថាធិប្បាយតាមអ៊ីមែល ទេ ៕

# Construction on S Reap Airport To Begin in 2011

BY PHILIP HEIJMANS
THE CAMBODIA DAILY

South Korean-funded development firm NSRIA Co announced Wednesday that it will begin construction in mid-2011 on a new $1 billion international airport in Siem Reap that will include an attached 40-square-km "new city."

According to the statement, the project will include a 100,000-square-meter terminal and facilities that will be able to take on 33 aircrafts at a time, making it possible to handle 15 million passengers annually.

"This represents Cambodia's largest national project and Korea's first-ever export of its airport development and operation expertise," the statement said.

According to Seoyoung Park, a general manager at Lees Aviation & Airport Co, one of the two major investors in the project, a "special economic zone or new city will accompany the airport" and include a dry port, resorts and other leisure facilities.

The first phase of the project will use $500 million to build a 40,000-square-meter terminal capable of handling 4 million passengers a year. The rest of the $1 billion will go into the final phase of development. The completion date is not yet known.

The new airport will also be the fist facility in the country capable of handling direct long-haul flights from Europe and North America, helping to increase the influx of visitors, the statement said.

Siem Reap provincial deputy governor Bun Tharith said the project would bring in jobs and capital, and increase tourism to the area. "[The project] could help to reduce poverty when completed."

Through October this year, Cambodia has welcomed about 2 million visitors, with about half arriving by air and only about 1 million visiting Siem Reap, the Tourism Ministry said. Tourism to Siem Reap is expected to increase to 4 million annually by 2015, and 7 million by 2020.

Societe Concessionnaire des Aeroports, which is in charge of Phnom Penh and Siem Reap international airports, said yesterday that plans are in the works to increase Siem Reap airport's passenger traffic capacity from 1.56 million to 6 million. The group declined comment on the development of the new airport.

*(Additional reporting by Khuon Narim)*

# ការស្ថាបនាអាកាសយានដ្ឋាននៅខេត្តសៀមរាបនឹងចាប់ផ្តើមនៅឆ្នាំ២០១១

ដោយ PHILIP HEIJMANS
THE CAMBODIA DAILY

ក្រុមហ៊ុនអភិវឌ្ឍន៍មួយឈ្មោះ NSRIS Co ដែលផ្តល់មូលនិធិដោយប្រទេសកូរ៉េខាងត្បូងបានប្រកាសកាលពីថ្ងៃពុធថា ខ្លួននឹងចាប់ផ្តើមស្ថាបនាអាកាសយានដ្ឋានអន្តរជាតិថ្មីមួយ ដែលនឹងចំណាយអស់ប្រាក់១ពាន់លានដុល្លារនៅពាក់កណ្តាលឆ្នាំ២០១១ នៅក្នុងខេត្តសៀមរាប ដែលនឹងរួមមានទាំង "ទីក្រុងថ្មី" មួយដែលមានផ្ទៃក្រឡា៤០គីឡូម៉ែត្រការេផងដែរ ។

យោងតាមសេចក្តីថ្លែងការណ៍នេះបានឱ្យដឹងថា គម្រោងនេះនឹងរួមមានទាំងចំណត និងអគារដែលមានផ្ទៃក្រឡាចំនួន ១០០.០០០ម៉ែត្រការេផងដែរ ដែលនឹងមានសមត្ថភាពអាចទទួលយន្តហោះបានចំនួន៣៣គ្រឿងនៅក្នុងពេលតែមួយដោយធ្វើឱ្យអាកាសយានដ្ឋាននេះអាចទទួលអ្នកដំណើរបានចំនួន១៥លាននាក់ក្នុងមួយឆ្នាំៗ ។

សេចក្តីថ្លែងការណ៍នេះបានលើកឡើងថា "នេះជាគម្រោងថ្នាក់ជាតិដ៏ធំបំផុតរបស់ប្រទេសកម្ពុជា និងជាការពាំនាំលើកដំបូងដែលមិនធ្លាប់មានរបស់ប្រទេសកូរ៉េខាងត្បូងនូវជំនាញប្រតិបត្តិការ និងអភិវឌ្ឍអាកាសយានដ្ឋានរបស់ខ្លួនទៅក្រៅប្រទេស" ។

យោងតាមលោក សេយ៉ុង ប៉ាក ជានាយកគ្រប់គ្រងទូទៅនៃក្រុមហ៊ុន Lees Aviation & Airport Co ដែលជាក្រុមហ៊ុនមួយក្នុងចំណោមក្រុមហ៊ុនវិនិយោគធំៗទាំងពីរនៅក្នុងគម្រោងនេះបានឱ្យដឹងថា "តំបន់សេដ្ឋកិច្ចពិសេសឬទីក្រុងថ្មីមួយនឹងអមជាមួយនឹងអាកាសយានដ្ឋាននេះ" ដែលរួមមានទាំងផែស្ងួតមួយ រមណីដ្ឋាន និងកន្លែងកំសាន្តផ្សេងៗទៀតផងដែរ ។

សេចក្តីថ្លែងការណ៍លើកឡើងថា ដំណាក់កាលដំបូងនៃគម្រោងនេះដែលគេរំពឹងថា នឹងចាប់ផ្តើមនៅពាក់កណ្តាលឆ្នាំ២០១១នោះនឹងប្រើប្រាស់ថវិកាដំបូងចំនួន៥០០ដុល្លារ ដើម្បីស្ថាបនាចំណតមួយដែលមានផ្ទៃក្រឡា៤០.០០០ម៉ែត្រការេ ដែលមានសមត្ថភាពផ្ទុកអ្នកដំណើរបាន៤លាននាក់ក្នុងមួយឆ្នាំ ។ ចំណែកដែលនៅសល់ទាំងអស់នៃថវិកាចំនួន១ពាន់លានដុល្លារនេះ នឹងធ្លាក់ទៅលើដំណាក់កាលចុងក្រោយនៃការអភិវឌ្ឍនេះ ។ ការបរិច្ឆេទនៃការស្ថាបនាបញ្ចប់នៅមិនទាន់ដឹងនៅឡើយទេ ។

សេចក្តីថ្លែងការណ៍នេះបានលើកឡើងទៀតថា អាកាសយានដ្ឋានថ្មីនេះក៏នឹងអាកាសយានដ្ឋានដំបូងបង្អស់នៅក្នុងប្រទេសកម្ពុជាផងដែរ ដែលមានសមត្ថភាពអាចធ្វើប្រតិបត្តិការជើងហោះហើរក្នុងចម្ងាយឆ្ងាយដោយផ្ទាល់ពីអឺរ៉ុប និងអាមេរិកខាងជើងដែលនឹងជួយបង្កើនលំហូរភ្ញៀវទេសចរ ។

លោក ប៊ុន ថារិទ្ធ ជាអភិបាលខេត្តសៀមរាប បានមានប្រសាសន៍ថា លោកមានអារម្មណ៍រំភើបចំពោះគម្រោងនេះណាស់ ព្រោះវានឹងនាំមកនូវការងារ និងទុន ហើយនឹងបង្កើនទេសចរណ៍នៅក្នុងតំបន់នេះ ។ "ប្រជាជនកម្ពុជានឹងមានការងារធ្វើ ហើយគម្រោង នេះនឹងជួយកាត់បន្ថយភាពក្រីក្រនៅពេលដែលគម្រោងនេះបញ្ចប់" ។

ក្រសួងទេសចរណ៍បានឱ្យដឹងកាលពីម្សិលមិញថា រហូតមកទល់ខែតុលាឆ្នាំនេះ ប្រទេសកម្ពុជាបានស្វាគមន៍ភ្ញៀវទេសចរសរុបប្រហែល ២.០០៩.០០០នាក់ដោយចំនួនប្រហែលពាក់កណ្តាលបានចូលមកតាមផ្លូវអាកាស ហើយមានតែប្រមាណ១លាននាក់ប៉ុណ្ណោះដែលបានចូលទៅលេងខេត្តសៀមរាប ។ ត្រឹមឆ្នាំ២០១៥ វិស័យទេសចរណ៍នៅខេត្តសៀមរាប ត្រូវបានគេរំពឹងថានឹងបង្កើនភ្ញៀវទេសចររហូតដល់ ៤លាននាក់ក្នុងមួយឆ្នាំ និង៧លាននាក់ត្រឹមឆ្នាំ២០២០ ។

ក្រុមហ៊ុន Societe Concessionnaire des Aeroports ដែលទទួលបន្ទុកគ្រប់គ្រងអាកាសយានដ្ឋានអន្តរជាតិភ្នំពេញ និងអាកាសយានដ្ឋានអន្តរជាតិសៀមរាប បានលើកឡើងកាលពីម្សិលមិញថា ផែនការនានាកំពុងស្ថិតក្នុងការរៀបចំ ដើម្បីបង្កើនសមត្ថភាពដឹកអ្នកដំណើររបស់អាកាសយានដ្ឋានខេត្តសៀមរាបពី១.៥៦លាននាក់នាពេលនេះរហូតដល់៦លាននាក់ បើទោះជាការបរិច្ឆេទសម្រាប់គម្រោងទាំងនេះមិនទាន់ត្រូវបានបញ្ជាក់ច្បាស់ក៏ដោយ ។ ក្រុមហ៊ុននេះបានបដិសេធមិនធ្វើអត្ថាធិប្បាយអំពីការអភិវឌ្ឍអាកាសយានដ្ឋានថ្មីនេះទេ ៕

*(រាយការណ៍បន្ថែមដោយ ឃួន ណារីម)*

តមកទំព័រទី ០៧

# វត្តត្រៃរតនារាមស្វែងរកទីបញ្ចប់...



ព្រះតេជគុណ សៅ ឃន

កិច្ចប្រជុំនៃគណកម្មាធិការនាយក បានផ្តើមនៅម៉ោង២រសៀលក្រោមការតាមដានស្តាប់យ៉ាងយកចិត្តទុកដាក់នៃឧបាសក ឧបាសិកាជើងវត្ត រួមទាំងព្រះសង្ឃទាំងវត្តលើ និងវត្តក្រោមរួមគ្នា តែពុំមានវត្តមានរបស់ ព្រះគ្រូចៅអធិការវត្តលើ សៅ ឃន ចូលរួមទេ។ កិច្ចប្រជុំនៅក្រោមសញ្ញានៃការប្រុងប្រយ័ត្នគ្រប់ជំហ៊ានជាសញ្ញានៃការមិនចង់បន្តទំនាស់និងកំហុសនាអតីតកាលប្រមាណជាង១០ឆ្នាំកន្លងមកនេះ បណ្តាលឱ្យសហគមន៍វត្តអារ៉ាមខ្មែរជាទូទៅមានភាពអាម៉ាស ជួសមុខឱ្យវត្តត្រៃរតនារាម ដែលបានបែងចែកជាពីរ ហើយមានពាក្យប្តឹងផ្តល់ឡើងតុលាការអស់រយៈពេលយ៉ាងវែង ចាប់តាំងពីបានទទួលដំណឹងថា អាជ្ញាប័ណ្ណវត្តត្រៃរតនារាម ត្រូវប្តូរម្ចាស់កាលពី ១០ឆ្នាំមុនមក។

អាជ្ញាប័ណ្ណបានប្រគល់ឱ្យគណកម្មាធិការវត្តដែលទើបនឹងចុះសម្រុងថ្មីៗនេះមកវិញហើយ តែសញ្ញានៃទំនាស់នៅមានស្នាកស្នាមនៅឡើយ ដោយសារសម្ពាធនៃទំនាស់នោះ បានបង្កើតឱ្យមានប្រធានគណកម្មាធិការនាយកដល់ទៅពីរ ដែលនឹងចូលរួមទទួលខុសត្រូវឆ្លាស់គ្នា ខុសនឹងលក្ខន្តិកៈដែលចែងថា គណកម្មាធិការនាយក ត្រូវមានតែ ១៣នាក់ ដែលរូបភាពពិតមាន ១៤នាក់ទៅវិញ ។ គណកម្មាធិការដែលបានកើតឡើងនាសប្តាហ៍នោះ គឺជាការខំប្រឹងប្រែងរបស់តុលាការរៀបចំរូបមន្តតាំងតែពីឆ្នាំ២០០៦មកម្ល៉េះ ហើយទើបតែធ្វើបានសម្រេចនាពេលនេះ។ រណ្សបមន្តនោះ គឺសមាជិកនៃគណកម្មាធិការនោះមាន៤នាក់ មកពីវវត្តលើ៤នាក់មកពីវត្តក្រោម ហើយអ្នកទាំង៨នាក់នោះ ជ្រើសរើសរកអ្នកអព្យាក្រិតចំនួន ៥រូបមកបង្គ្រប់ជា ១៣ មុននឹងតែងតាំងប្រធានមួយរូប តែដោយសារលេខសេសជាសញ្ញានៃកម្លាំងនៃក្រុម១ទៅលើក្រុមទៀត ទើបអង្គប្រជុំចែចូវគ្នាឱ្យមានប្រធានពីររូប ដែលធ្វើការឆ្លាស់គ្នា១ខែម្នាក់ ជាអន្តនកាលរហូតដល់មានការរៀបចំច្របាច់វត្តបញ្ចូលគ្នាវិញចប់សព្វគ្រប់ រៀបចំការបោះឆ្នោតសារជាថ្មី ពេលនោះទើបមានភាពស្ថាពរទៅបាន។

គណកម្មាធិការនាយកនាពេលនេះមាន ១- លោក អ៊ុន វណ្ណថន បច្ចុប្បន្នជាប្រធាន, ២- លោក សុខ អ៊ឹម ជាប្រធានខែក្រោយ, ៣- លោកស្រី ទិតហុង វិយ៉ាដា ជាសហលេខា, ៤- លោក ស ផែល សហលេខា, ៥- លោក អ៊ុង ដារ៉ារិទ្ធ សហ ហិរញ្ញិក, ៦- លោកស្រី ម៉ែន ម៉ាយ៉ា សហហិរញ្ញិក ហើយនិងសមាជិក៨រូបទៀត, ៧- លោក អេង វីដា, ៨- លោក ហ្វាណែល ជ័យសម្បត្តិ, ៩- លោកវេជ្ជបណ្ឌិត កែវ សម្បត្តិ, ១០- លោក នាគ កុសល, ១១- លោក ទិត សារុន, ១២- លោក អ៊ុង រិទ្ធី, ១៣- លោក វែន វតនា, ១៤- សាន់ ប៊ិន ។



សហប្រធាន សុខ អ៊ឹម

សហប្រធាន អ៊ុន វណ្ណថន



គណៈកម្មាការថ្មីបញ្ជូនគ្នា

គណកម្មាធិការនេះនឹងប្រឈមមុខចំពោះសេចក្តីសម្រេចដ៏ធំៗ ទៅថ្ងៃមុនក្នុងភារៈកិច្ចច្របាច់បញ្ចូលគ្នា និងធានាឱ្យវត្តនេះក្លាយជាមណ្ឌលពុទ្ធសាសនាខ្មែរទៅបាន។ ភារៈកិច្ចនេះនឹងតម្រូវឱ្យមានការអារកាត់ដ៏ឈឺចាប់មួយចំនួន ដើម្បីឆ្លងវត្តចែចូវឱ្យដុតទៅដល់វត្តប្រៀបធៀបភាពត្រូវ និងខុសរបស់ប្រតិប័ត្តឱ្យបានច្បាស់លាស់ ដូចដែលធម៌ព្រះពុទ្ធបានចែងរួចមកហើយ។ បើឆ្លងរួចពេលនោះទើបជម្ងឺវត្តនឹងបានជាសះស្បើយ ភាពមាមួននឹងអាចកើតមកវិញដូចប្រាថ្នា ៕



រីករាយដោយដឹងថាវត្តឈប់ឈ្លោះគ្នា



ស្តាប់សេចក្តីរាយការណ៍របស់ប្រធានថ្មី



ដំបូងបង្អស់ និងមានតែមួយនៅហ្វីឡាដែលរញ្ជៀ

**"ហាងកុំព្យូទ័រដែលគេប្រើរួចហើយ"**

ធ្វើប្រព័ន្ធកុំព្យូទ័រ * កុំព្យូទ័រសំរាប់ធ្វើដំណើរ * គ្រឿងបន្លាស់ * ជួសជុលកុំព្យូទ័រ *

***Philadelphia's First and Only***

## Computer Thrift Store

**Computer Systems * Laptops * Accessories * Computer Repair ***

**Monday-Friday 10am-6pm. Saturday 10am-40pm**

បើពុំមានថវិការគ្រប់គ្រាន់សំរាប់ទិញកុំព្យូទ័រថ្មី ហេតុអ្វីក៏មិនរកកុំព្យូទ័រដែលគេធ្លាប់ប្រើ តែអាចធានាគុណភាពបាន ! សូមអញ្ជើញមកមើលសម្ភារៈដែលលោកអ្នកត្រូវការ នៅអាស័យដ្ឋាន ខាងក្រោម :

## Nonprofit Technology Resources

**1524 Brandywine Street. 1 Block North of 15th & Spring Garden St.**

***We Provide Free Parking! We accept computer donations (Tax Write-Off)***

## 215-564-6686

ខ្មែរប៉ុស្តិ៍ ស.រ.អា **ខ្មែរប៉ុស្តិ៍**

ឱកាសចូលឆ្នាំថ្មីមកដល់ហើយ ! លោកអ្នកអាចបញ្ជូនសារជាសាធារណៈ ជាការជូនព័ត៌មាន ជាការស្វែងរក ជាពិសេសប្រើឱកាសដ៏សំខាន់នេះ សំរាប់ជូនពរសព្ទសាធុការដល់ញាតិមិត្ត ឬក៏ភ្ញៀវដ៏ល្អដែលធ្លាប់មានការប្រាស្រ័យទាក់ទងជាមួយកិច្ចការ ឬពាណិជ្ជកម្មលោកអ្នក ។ ការថែរក្សាអារម្មណ៍ល្អរបស់ចាស់ទុំ-មិត្តភ័ក្រ្ត ឬភ្ញៀវពិសេស គឺប្រាកដជាការបង្កើនគុណសម្បត្តិខ្ពស់សំរាប់អនាគតដ៏ប្រសើរនៃជីវិត និងមុខរបរមិនខុសចិត្តឡើយ ។



សុបិន : (267) 253-3947
សុផល : (978) 758-8547
សែម : (781) 244-0522

# SAIGON PLAZA



ជាហាងថ្មីស្រឡាង ស្ថិតនៅញូជើស៊ីខាងត្បូង-យើងមានរបស់គ្រប់យ៉ាងដែលលោកអ្នកត្រូវការ នៅមិនឆ្ងាយពីផ្ទះ

## 新城超級市場

## SUNSENG SUPERMARKET

5201 Kaighns Ave (Route 38 W ) Pennsauken, NJ 08109

Tel : (856) 663-2238

- បន្លែបង្កាស្រស់ៗមកពីចំការ
- គ្រឿងសមុទ្រ -ត្រីរស់គ្រប់យ៉ាងដែលលោកអ្នកចូលចិត្ត
- សាច់ : មានសាច់គ្រប់មុខ សាច់ជ្រូក-មាន់-គោ-ចៀម... ។ល។





- នៅបរិវេណប្លាហ្សា មានពាណិជ្ជកម្មផ្សេងៗទៀត ដូចជា : កាហ្វេ ទូឡាន -ហ្វើពាផ- ABC ប្តូរលុយ -លក់សំបុត្រយន្តហោះ មានហាងកាត់ និងអ៊ុតសក់ -JB ក្រុមហ៊ុនអាស៊ាន -ក្រុមហ៊ុនធ្វើតាក់ពន្ធដារ
- បើកទ្វារមួយអាទិត្យ : ៧ថ្ងៃ ពីម៉ោង 8:00 AM ដល់ 9:00 PM
- បុគ្គលិកនៅបំរើយ៉ាងរាក់ទាក់ ដើម្បីបំពេញបំណងលោកអ្នក
- យើងទទួល Credit Card -Food Stamp-EBT- Family Card








នៅមានបន្ទប់
សំរាប់ធ្វើការិយាល័យ
សំរាប់ជួល

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ដំណើចប្រែសំរួលពីភាសាអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃសុក្រ ទី១៧ ខែធ្នូ ឆ្នាំ២០១០

# Prison for Embezzling $600K

By Khy Sovuthy
The Cambodia Daily

Phnom Penh Municipal Court yesterday sentenced a former Finance Ministry official to 10 years in jail and ordered him to pay back more than $600,000 that he embezzled from the National Bank of Cambodia by forging checks.

"The court decided to sentence Kuy Dara to 10 years in prison and ordered him to pay back $606,000 to the Ministry of Economy and Finance," presiding Judge Ke Sakhorn said as he read the verdict.

Judge Sakhorn said the court had decided to charge Mr Dara with embezzlement and forging public documents under articles 601 and 629 of the new criminal procedure code.

Kuy Dara, 43, then-acting bureau director within the ministry's industry and finance department, confessed during a Dec 3 hearing to withdrawing an unspecified number of checks signed by department director Mey Vann between January 2009 and April 2010. He then increased the amount payable and cashed the checks at the National Bank.

During his confession in court, Mr Dara also admitted losing all his ill-gotten gains at the NagaWorld casino in Phnom Penh.

"I took the money to go gambling at NagaWorld, and I lost," he said.

Defense lawyer Ouk Siroeun said yesterday that he felt the decision was fair given his client's confession. He said he was particularly pleased Mr Dara had been sentenced under the new criminal procedure code, as the new code carries a less-severe punishment than the old Untac law.

"It is suitable.... I will discuss with my client whether he will appeal," he said.

However, he reiterated his belief that his client could not have carried out the scam without help, despite Mr Dara's insistence that he acted alone.

Deputy Prosecutor Ek Chheng Hout and Theng Meng Y, lawyer for the ministry, both declined comment yesterday, while Mr Dara's former supervisor, Mr Vann, said he was too busy to speak to a reporter.

Cambodian citizens are forbidden from playing at gaming venues such as NagaWorld. Mr Siroeun said he had no idea how his client had been allowed to gamble in the casino.

# កាត់ទោសអតីតមន្ត្រីម្នាក់ឱ្យជាប់ពន្ធនាគ១០ឆ្នាំពីបទបន្លំលួចប្រាក់៦០០.០០០ដុល្លារ

ដោយឃី សុវុទ្ធី, THE CAMBODIA DAILY

កាលពីម្សិលមិញ តុលាការក្រុងភ្នំពេញបានកាត់ទោសអតីតមន្ត្រីក្រសួងហិរញ្ញវត្ថុម្នាក់ឱ្យជាប់ពន្ធនាគាររយៈពេល១០ឆ្នាំ និងបង្គាប់ឱ្យរូបលោកសងប្រាក់ចំនួនជាង៦០០.០០០ដុល្លារ ដែលលោកបានបន្លំលួចពីធនាគារជាតិនៃកម្ពុជា ដោយការក្លែងមូលប្បទានប័ត្រ ។

លោក កែ សាខន ជាចៅក្រមជំនុំជម្រះបានមានប្រសាសន៍ខណៈពេលលោកបានអានសាលក្រមថា "តុលាការបានសម្រេចកាត់ទោសលោក គុយ តារា ឱ្យជាប់ពន្ធនាគាររយៈពេល១០ឆ្នាំ និងបង្គាប់ឱ្យរូបលោកសងប្រាក់ចំនួន ៦០៦.០០០ដុល្លារទៅក្រសួងសេដ្ឋកិច្ច និងហិរញ្ញវត្ថុវិញ ។

លោកចៅក្រម កែ សាខន បានមានប្រសាសន៍ថា តុលាការបានសម្រេចចោទប្រកាន់លោក គុយ តារា ពីបទបន្លំលួច និងក្លែងឯកសារសាធារណៈតាមមាត្រា៦០១ និង៦២៩ នៃក្រមនីតិវិធីព្រហ្មទណ្ឌថ្មី ។

លោក គុយ តារា អាយុ៤៣ឆ្នាំដែលពេលនោះជាប្រធានការិយាល័យស្តីទីនៅក្នុងនាយកដ្ឋានឧស្សាហកម្ម និងហិរញ្ញវត្ថុនៅក្រសួងនេះបានសារភាពអំឡុងការកាត់ក្តីកាលពីថ្ងៃទី៣ ខែធ្នូថា បានដកមូលប្បទាន-ប័ត្រមួយចំនួនដែលត្រូវបានចុះហត្ថលេខាដោយលោក ម៉ី វណ្ណ ជាប្រធាននាយកដ្ឋានពីខែមករា ឆ្នាំ២០០៩ដល់ ខែមេសា ឆ្នាំ២០១០ ។

បន្ទាប់មក លោកបានបង្កើនខ្ទង់ចំណាយ ហើយបានបើកប្រាក់ដោយប្រើមូលប្បទានប័ត្រនៅធនាគារជាតិនៃកម្ពុជា ។ អំឡុងការសារភាពនៅតុលាការលោក គុយ តារា ក៏បានសារភាពថា បានចាញ់អស់ប្រាក់ទាំងនោះនៅកាស៊ីណូណាហ្គាវើលនៅក្នុងទីក្រុងភ្នំពេញ ។ លោកបាននិយាយថា "ខ្ញុំបានយកប្រាក់ទាំងនេះទៅលេងល្បែងនៅណាហ្គាវើល ហើយចាញ់អស់" ។

លោក អ៊ុក ស៊ីរឿន ជាមេធាវីកាត់ក្តីបានមានប្រសាសន៍កាលពីម្សិលមិញថា លោកគិតថា សេចក្តីសម្រេចនេះគឺសក្តិសមដោយការសារភាពរបស់កូនក្តីលោក ។

លោកបានមានប្រសាសន៍ថា ជាពិសេសលោករីករាយចំពោះការកាត់ទោសលោក គុយ តារា តាមក្រមនីតិវិធីព្រហ្មទណ្ឌថ្មី ពីព្រោះក្រមព្រហ្មទណ្ឌថ្មីនេះ មានការដាក់ទោសស្រាលជាងច្បាប់អ៊ុនតាក់ចាស់ ។

លោកបានមានប្រសាសន៍ថា "វាសក្តិសមហើយ... ។ ខ្ញុំនឹងពិភាក្សាជាមួយកូនក្តីរបស់ខ្ញុំថា តើគាត់នឹងប្តឹងឧទ្ធរណ៍ឬយ៉ាងណា" ។ ទោះជាយ៉ាងណាលោកបានបញ្ជាក់ឡើងវិញពីជំនឿរបស់លោកថា កូនក្តីរបស់លោកមិនអាចធ្វើរឿងនេះតែម្នាក់ឯងបានទេ បើទោះជាមានការអះអាងរបស់លោក គុយ តារា ថាគាត់បានធ្វើតែម្នាក់ឯងក៏ដោយ ។

លោក ឯក ឆេងហួត ជាព្រះរាជអាជ្ញារង និងលោក ថេង ម៉េងអ៊ី ជាមេធាវីតំណាងក្រសួងបានបដិសេធ មិនធ្វើអត្ថាធិប្បាយកាលពីម្សិលមិញ ចំណែកលោក ម៉ី វណ្ណ ជាអតីតប្រធានរបស់លោក គុយ តារា បានមានប្រសាសន៍ថា លោករវល់ណាស់មិនអាចនិយាយជាមួយអ្នកយកព័ត៌មានបានទេ ។

ប្រជាពលរដ្ឋកម្ពុជាត្រូវបានហាមប្រាមមិនឱ្យលេងល្បែងនៅតាមកាស៊ីណូនានាដូចជាណាហ្គាវើល ជាដើម ។ លោក អ៊ុក សារឿន បានមានប្រសាសន៍ថា តើកូនក្តីរបស់លោកត្រូវបានអនុញ្ញាតឱ្យលេងល្បែងនៅកាស៊ីណូនេះដោយរបៀបណាទេ ៕

# Union Leader Speaks Out Over Drug 'Setup'

*Sous Chantha arrested for carrying as-yet unidentified substance*

By Hul Reaksmey
The Cambodia Daily

Suos Sophat was able to spend only half an hour with her little brother yesterday. She spent most of the time clinging to his side, reaching out occasionally to smooth his hair or finger the handcuffs ringing his wrists.

"I don't have anything to say since a good person is handcuffed," she said. "Handcuffs are only for bad people."

Her brother, union representative Suos Chantha, 27, has spent the last month in prison charged with distributing drugs.

Phnom Penh Municipal Court questioned Mr Chantha yesterday—the first time he has been before the court since a brief interview conducted the day after his arrest.

Standing outside the chamber in his regulation prison blues, Mr Chantha was able to speak with reporters about his situation before being led back into pretrial detention.

"This is a harsh accusation. There is someone at my workplace trying to put the blame on me, so that I will be fired from my job," he said.

Military police arrested Mr Chantha after he left work on Nov 18 for carrying a substance they claim was a drug, but have still not identified. Rights groups, unions and co-workers have all voiced serious concerns regarding the circumstances of the arrest.

Mr Chantha was a representative for the CPP-affiliated Democratic Independent Solidarity Union Federation at the United Apparel garment factory in Sen Sok district. However, he was in negotiations to lead almost 1,000 workers to defect to the Coalition of Cambodian Apparel Workers Democratic Union in the days before his arrest.

"It could be connected [to the proposed defection]. I want to say this is a setup, but I don't want to make any conclusions about who did this to me," Mr Chantha said.

Police claim they spotted Mr Chantha trying to avoid a traffic checkpoint, and pulled him over because he was acting suspicious. Police allegedly discovered the unidentified narcotic hidden in the saddle of his motorbike.

"I just opened my motorbike's saddle, then I was pulled away from my motorbike. They said there were drugs in my motorbike, but I swear that I never knew about these drugs before," Mr Chantha said, adding that police pushed and struck him repeatedly during the arrest.

CCAWDU President Ath Thon attended the hearing yesterday to support the young union representative. He claimed Mr Chantha's arrest was an attack aimed at his organization.

"It is an act of intimidation on union representatives. It is an activity to cause trouble for me," he said.

Phoung Mountry, DISUF president, has claimed that the workers who planned to defect have now changed their minds, and has repeatedly expressed his support for Mr Chantha while denying that the union had anything to do with his arrest. Mr Mountry was not at the court yesterday.

# សមាគមប្រូវិដិន ធ្វើការជ្រើសរើសប្រធានថ្មី

ដោយ ហេង សុវណ្ណ

រ៉ូដអាយឡិន : បេក្ខជន ដែលឈរឈ្មោះជាប្រធានសមាគមសំរាប់ការបោះឆ្នោតអាណត្តិឆ្នាំ ២០១១ខាងមុខនេះគឺមានតែមួយរូបប៉ុណ្ណោះ គឺលោក កែវ សំណាង ។ ដំបូងឡើយ យើងទទួលព័ត៌មានបានថា មានបេក្ខជនពីររូប ទីមួយគឺ លោក រ័ត្ន សារិន ជាប្រធានសមាគមបច្ចុប្បន្ន និងទីពីរ គឺលោក កែវ សំណាង ប៉ុន្តែក្រោយមក



កែវ សំណាង

លោក រ័ត្ន សារិន បានប្តូរចិត្តទៅវិញដោយលោកការរវល់នៅកិច្ចផ្ទាល់ខ្លួន ហើយម្យ៉ាងទៀតគឺលោកមានបញ្ហាផ្នែកសុខភាពផង ទើបលោកមិនអាចបំរើនូវកិច្ចការនេះបានតទៅទៀត ។ ហើយលោកក៏សូមអំពាវនាវម្តងហើយម្តងទៀតដល់ប្រជាពលរដ្ឋខ្មែរយើងទាំងអស់ចូលរួមបោះឆ្នោតជ្រើសរើសប្រធានសមាគមសំរាប់អាណត្តិថ្មី ។

**លោក កែវ សំណាង អតីតប្រធានសមាគមក្នុងអាណត្តិឆ្នាំ**

នៅពេលដែលយើងសាកសួរទៅលោកថា: តើកត្តាអ្វីខ្លះដែលជំរុញឱ្យលោកវិលត្រឡប់មកឈរឈ្មោះជាបេក្ខជនសំរាប់អាណត្តិថ្មីនេះម្តងទៀត?

លោកបានមានប្រសាសន៍ថា : ទីមួយគឺមានការទទូចសុំអំពីសំណាក់បងប្អូនប្រជាពលរដ្ឋខ្មែរមួយចំនួនធំនៅក្នុងរដ្ឋរ៉ូដអៃឡិនយើងនេះ ដោយបងប្អូនយល់ឃើញថា ក្នុងប៉ុន្មានឆ្នាំចុងក្រោយនៃការដឹកនាំរបស់ប្រធានសមាគមបច្ចុប្បន្នគឺអសម្ថតភាព ម៉្យាងទៀតបានធ្វើឱ្យកេរ្តិ៍ឈ្មោះនៃសមាគមខ្មែរសាបរលាប ដែលស្ទើរតែបាត់បង់ទាំងស្រុង ។

ហើយបងប្អូនយើងលោកមើលឃើញថា កាលពីជំនាន់ខ្ញុំធ្វើជាប្រធានសមាគមក្នុងអាណត្តិឆ្នាំ១៩៩៦ គឺមានការរីកចំរើនច្រើន ដោយកាលណោះប្រជាពលរដ្ឋខ្មែរយើងមានទំនាក់ទំនងគ្នាល្អ មានភាពជិតស្និតចំពោះគ្នានឹងគ្នាមិនប្រកាន់បក្សពួក ។ ហើយខ្ញុំបានបង្កើតជាកម្មវិធីអប់រំសីល វប្បធម៌ និងអក្សរសាស្ត្រខ្មែរដល់យុវជនខ្មែរនៅរដូវក្តៅ ហើយការវិលត្រឡប់របស់ខ្ញុំម្តងនេះខ្ញុំនឹងលើកស្ទួយកេរ្តិ៍ឈ្មោះសមាគមខ្មែរឡើងវិញ និងជួយជាប្រយោជន៍ផ្សេងៗជូនដល់ប្រពលរដ្ឋខ្មែរយើង ហើយខ្ញុំក៏សូមអំពាវនាវដល់ប្រជាពលរដ្ឋខ្មែរយើងដែលរស់នៅក្នុងរដ្ឋរ៉ូដអៃឡិន ទាំងអស់ចូលរួមបោះឆ្នោតអោយបានគ្រប់ៗគ្នា ដើម្បីទទួលបាននូវអ្នកដឹកនាំដ៏ត្រឹមត្រូវមួយសំរាប់សង្គមខ្មែរយើង។ សូមបញ្ជាក់ថាការបោះឆ្នោតជ្រើសរើសប្រធានសមាគមខ្មែរក្នុងអាណត្តិឆ្នាំ២០១១ នឹងប្រព្រឹត្តទៅនៅថ្ងៃអាទិត្យ ទី២ ខែមករា ឆ្នាំ២០១១ វេលាម៉ោង១០ព្រឹកដល់ម៉ោង២រសៀល នៅឯ West End Community Center 109 Bucklin st. Providence, RI 02907 ។ ខាងក្រោមនេះជាប្រវត្តិរូបសង្ខេបលោក កែវ សំណាង

លោក កែវ សំណាង កើតនៅខែឧសភា ឆ្នាំ១៩៦១ នៅភូមិគោកពពេល ស្រុកអង្គស្នួល ខេត្តកណ្តាល ប្រទេសកម្ពុជា។

**អាស័យដ្ឋានបច្ចុប្បន :** **103 Alger Avenue Providence, RI 02907**

**Tel: H (401) 521-0832, C (401) 419-9572, W (401) 458-5400**

**Email: khmerunity@hotmail.coom**

**បទពិសោធន៍ការងារ :**

-១៩៨៨-១៩៩៤:បំរើការជាអគ្គហិរញ្ញិក និងជាប្រធានសមាគមខ្មែរ នៃ រដ្ឋរ៉ូដអៃឡិន្ត

-២០០០-២០០២: បំរើការជា អគ្គហិរញ្ញិក នៅវត្តធម្មិការាម នៅទីក្រុង ប្រូវិដិន រ៉ូដអៃឡិន្ត

-១៩៨៥-១៩៨៧ : បំរើការនៅធានាគាស៊ីធីសែន (Citizens Bank)

-១៩៨៧-១៩៨៨: ទទួលខុសត្រូវខាងផ្ទះរដ្ឋក្នុងក្រុមហ៊ុនអ៊ីសលិន្តផ្រភើធី (Eastland Property Management)

-១៩៨៨-១៩៩០: ធ្វើការនៅរោងចក្រ Texas Instruments

-១៩៩០-១៩៩២: ទទួលខុសត្រូវខាងផ្ទះរដ្ឋក្នុងក្រុមហ៊ុន Ferland Property Management

-១៩៩២-បច្ចុប្បន្ន: បំរើការជាក្រឡាបញ្ជី (Deputy Supervisory Clerk) នៅតុលាការ នៃ រដ្ឋរ៉ូដអៃឡិន្ត

**ការសិក្សាអប់រំ :**

-១៩៩២ : បញ្ចប់ការសិក្សាថ្នាក់បរិញ្ញាប័ត្ររងផ្នែកខាងច្បាប់ (Criminal Justice) នៅមហាវិទ្យាល័យសហគមនៃរដ្ឋរ៉ូដអៃឡិន្ត (Community College of Rhode Island).




# ពីរដ្ឋបាលកុលសម្ព័ន្ធមករដ្ឋាភិបាលសម័យ

**ប្រែសម្រួលដោយ : ពិន សំខុន (តពីលេខមុន)**

•**២៦ មិថុនា** : រដ្ឋាភិបាលអូស្ត្រាលីខាងកិច្ចការបរទេស ប៊ិល ហាយដិន បានស្នើឱ្យបង្កើតតុលាការអន្តរជាតិសំរាប់ការទោស ប៉ុល ពត និងមេដឹកនាំខ្មែរក្រហម ។

•**១១ កក្កដា** : សភាអឺរ៉ុបបានអនុម័តគាំផែនការ ៨ ចំណុចរបស់រដ្ឋាភិបាលកម្ពុជាប្រជាធិបតេយ្យ ហើយផ្តន្ទាទោសការរំលោភសិទ្ធិមនុស្សដោយរដ្ឋកម្ពុជា ។

•**៨ សីហា** : រដ្ឋមន្ត្រីការបរទេសឥណ្ឌូណេស៊ីគាំទ្រ សំណើររបស់អូស្ត្រាលី ក្នុងការនាំយក ប៉ុល ពត មក កាត់ទោស ។

•**១១ សីហា** : កិច្ចប្រជុំរបស់រដ្ឋាភិបាលកម្ពុជាប្រជាធិបតេយ្យក្នុងតំបន់រំដោះ ។

•**២៧ សីហា** : សីហនុ ប្រកាសថា ខ្មែរក្រហមបានវាយប្រហារមកលើភូមិមួយ កាន់កាប់ដោយទ័ពសីហនុនិយម នៅខេត្តសៀមរាប ធ្វើឱ្យមានអ្នករងគ្រោះយ៉ាងច្រើន ។

•**២៥ កញ្ញា** : នៅអាមស្ទ័រដាម អង្គការក្រៅរដ្ឋាភិបាលចំនួន១៥ ដែលធ្វើការនៅស្រុកខ្មែរ ធ្វើការពិភាក្សាស្តីអំពីផលវិបាកសេដ្ឋកិច្ច និងសង្គមកិច្ចនៃការដាក់កម្ពុជាឱ្យនៅឯកោនយោបាយ ។

•**១៥ តុលា** : ភ្នំ ៥៣៨ ដែលនៅដែនដីថៃ ហើយកាន់កាប់ដោយទ័ពវៀតណាម តាំងពីថ្ងៃ២០ កញ្ញា មកនោះ បានត្រូវរងការវាយប្រហារតបមកវិញ អស់រយៈពេល១ខែទើបយកបាន ។

•**២១ តុលា** : អ.ស.ប អនុម័តដូចឆ្នាំមុនគាំទ្រការទទួលស្គាល់រដ្ឋាភិបាលកម្ពុជាប្រជាធិបតេយ្យ ដោយសម្លេង ១១៦ ប្រឆាំងចំនួន ២១ និងអនុប្បវាទចំនួន ១៣ ។

•**២ វិច្ឆកា** : សហគមន៍អាស៊ាន តវ៉ាប្រឆាំងការបើកការិយាល័យទំនាក់ទំនងជំនួយរបស់អូស្ត្រាលី នៅភ្នំពេញ ។

•**១១ វិច្ឆកា** : ក្រុមខ្មែរក្រហម និងក្រុមសីហនុនិយម ប្រកាសបើកសមយុទ្ធរួមគ្នា ។

•**១៤ វិច្ឆកា** : រដ្ឋមន្ត្រីការបរទេសសិង្ហបូរី បានពិពណ៌នាថា បើមានការគាំទ្រពីប្រទេសចិន គេអាចធានាថា មិនឱ្យមានការត្រឡប់មករកអំណាចរបស់ ប៉ុល ពត និងដៃជើងខ្មែរក្រហមវិញបាន ។

•**១១ ធ្នូ** : រៀបចំរដ្ឋាភិបាលថ្មីដ៏សំខាន់មួយនៅភ្នំពេញរបស់រដ្ឋបាល រដ្ឋកម្ពុជា និងមានឥទ្ធិពលរបស់រដ្ឋាភិបាលកាន់តែច្រើនទៅលើយន្តការនយោបាយ របស់រដ្ឋកម្ពុជាប្រជាមានិត ។

. រដ្ឋាភិបាល ហ៊ុន សែន (ថ្ងៃទី១១ ធ្នូ ១៩៨៦)

| | |
|---|---|
| . នាយករដ្ឋមន្ត្រី | : ហ៊ុន សែន |
| . ឧបនាយករដ្ឋមន្ត្រី | : ប៊ូ ថង |
| . ឧបនាយករដ្ឋមន្ត្រី | : ជា សុទ្ធ |
| . រដ្ឋមន្ត្រីការបរទេស | : គង់ គាំ |
| . អនុរដ្ឋមន្ត្រីការបរទេស | : ឌិត មន្ទីរ |
| . រដ្ឋមន្ត្រីការពារជាតិ | : កុយ ប៊ុនថា |
| . អនុរដ្ឋមន្ត្រីការពារជាតិ | : កែ គីមយ៉ាន |
| . រដ្ឋមន្ត្រីមហាផ្ទៃ | : ខាង សារិន |
| . រដ្ឋមន្ត្រីហិរញ្ញវត្ថុ និងពាណិជ្ជកម្ម | : ចាន់ ភិន |
| . រដ្ឋមន្ត្រីកសិកម្ម | : គង់ សំអុល |
| . រដ្ឋមន្ត្រីឧស្សាហកម្ម | : មាស សំណាង |
| . រដ្ឋមន្ត្រីផែនការ | : ជា ចាន់តូ |
| . រដ្ឋមន្ត្រីទំនាក់ទំនងវប្បធម៌ និងសេដ្ឋកិច្ចជាមួយបណ្តាប្រទេសសង្គមនិយម | : តាង សារឿន |
| . រដ្ឋមន្ត្រីដឹកជញ្ជូន-គមនាគមន៍-ប្រៃសណីយ | : ទា បាញ់ |
| . រដ្ឋមន្ត្រីយុត្តិធម៌ | : អ៊ុក ប៊ុនឈឿន |
| . រដ្ឋមន្ត្រីសុខាភិបាល | : យិត គីមសេង |
| . រដ្ឋមន្ត្រីកិច្ចការសង្គម និងជនរងគ្រោះដោយសង្គ្រាម | : ម៉ម សាប៊ុន |
| . រដ្ឋមន្ត្រីអប់រំជាតិ | : ប៉ែន ណាវុធ |
| . រដ្ឋមន្ត្រីឃោសនាការ-ព័ត៌មាន និងវប្បធម៌ | : ឆេង ផុន |
| . រដ្ឋមន្ត្រីគណៈកម្មាធិការត្រួតពិនិត្យរដ្ឋ | : ស៊ឹម កា |
| . រដ្ឋមន្ត្រីអមទីស្តីការគណៈរដ្ឋមន្ត្រី | : ឃុន ឈី |
| . នាយកខុទ្ទកាល័យក្រុមប្រឹក្សារដ្ឋមន្ត្រី | : អ៊ុង ផន |
| . នាយកធនាគារជាតិ | : ចា រៀង |

**ឆ្នាំ១៩៨៧**

ឆ្នាំនេះអង្គការ KEG បានប្តូររហ័សថា KAMPU CHEAN Working Grang ជាអង្គការសម្ងាត់មួយរៀបរៀង ដោយប្រទេសថៃ-ម៉ាឡេស៊ី នឹងសិង្ហបូរី គាំទ្រដោយស៊ីអាយអេ ជាអ្នកផ្តល់អាវុធយុទ្ធភណ្ឌចម្បាំង-ព័ត៌មានយោធានឹងផែនការសង្គ្រាមដល់ក្រុមមិនមែនកុម្មុយនិស្ត ដែលជាសម្ព័ន្ធមិត្តរបស់ក្រុមខ្មែរក្រហម ។ ប្រទេសថៃនឹងម៉ាឡេស៊ីជាអ្នកបង្ហាត់ហ្វឹកហ្វឺនយោធា-ប្រទេសសឹង្ហបូរីជាអ្នកផ្គត់ផ្គង់អាវុធ តាមរយៈអង្គការមួយឈ្មោះ Chartered Industries ហើយអង្គការ KWG នេះមានស្ថានីយវិទ្យុពីរផ្សាយពីក្រៅប្រទេសចូលទៅកម្ពុជា ។

៩ ១២មករា ៨៧ សីហនុទៅធ្វើទស្សនកិច្ចនៅប៉ូការ៉េស ហើយទទួលសារពីប្រធានាធិបតីឆាវឆេស្កូ ដែលផ្ញើមកពីវៀតណាម ដែលស្នើរឱ្យមានការចរចាដើម្បីឱ្យមានការឈប់បាញ់គ្នា-សម្តេចសីហនុបដិសេធសំណើរនោះ ។

•**២៤ មករា** : លោក ស៊ឺន សាន នៅពេលធ្វើទស្សនកិច្ចនៅសាយចូ (SETEZ) បានចោទប្រកាន់វៀតណាមថា បានសម្លាប់ខ្មែរក្រោមដែលរស់នៅភាគខាងត្បូងវៀតណាម ។

•**២៤កុម្ភៈ** : កងទ័ពរដ្ឋកម្ពុជាប្រជាធិបតេយ្យបានចាប់នាវានេសាទថៃបួនគ្រឿងនៅក្បែរកោះខ្មែរ "កោះចារ៍" ។

•**១០ មិនា** : រដ្ឋមន្ត្រីការបរទេស រុស្ស៊ី "អេឌូនាស្ទេវ៉ាណាកហ្សេ" មកធ្វើទស្សនកិច្ចនៅភ្នំពេញ

(នៅមានតលេខក្រោយទៀត)




# ពុទ្ធប្បវត្តិអមដោយរូបភាព

# A Pictorrial Biography of Saky amuni Buddha

❖ រូបភាព និងរឿងដើមជាភាសាថៃ ដោយ គុណាប៉ាយុតា
❖ បកប្រែជាភាសាអង់គ្លេស ដោយ ហ្សឹត .អេ.លី
❖ ផាត់ពណ៌ដោយ យ៉ាន់ ហ្វាលី
❖ បកប្រែជាភាសាខ្មែរដោយភិក្ខុ គង់ អាំ

**១០២-** វិជ្ជាដែលគ្រូអារទកាលាមៈបានបង្រៀនដល់ព្រះសិទ្ធត្ថ មានវិជ្ជាដ៏សំខាន់ៗអំពីសមាធិកម្មដ្ឋាន ដែលជាមាគ៌ាធ្វើចិត្តឱ្យស្ងប់ដើម្បីកំចាត់បង់ចោលនូវការគិតអំពីការកើតឡើងក្នុងភាពណាមួយ (អាកិញ្ច-ញ្ញាយតន) ព្រមទាំងរបៀបតាំងនៅសប្បាយក្នុងសមាធិ ។ ក៏ប៉ុន្តែចំណេះវិជ្ជាបែបនេះ នៅតែមិនទាន់ប្រាកដប្រជា ព្រមទាំងមិនទាល់ដល់ទីបំផុត (នៃក្តីទុក្ខបានទេ) ។ ព្រះសិទ្ធត្ថទ្រង់នៅតែមិនទាន់ពេញព្រះទ័យនៅឡើយ ព្រោះវិជ្ជាបែបនេះនៅមិនទាន់ ឆ្លើយតបចំពោះបញ្ហានៃការកើត និងស្លាប់. ចាស់ជរា និងព្យាធិដែលចេះតែធ្វើឱ្យព្រះទ័យព្រះអង្គទ្រង់ខ្វាយខ្វល់ជានិច្ច ។ ដោយហេតុយ៉ាងនេះហើយ ទីបំផុតព្រះសិទ្ធត្ថទ្រង់ក៏លាលោកគ្រូអាចារ្យ ហើយយាងចេញពីទីនោះបន្តព្រះដំណើរទៅទៀត ដើម្បីស្វែងរកគ្រូដែលមានចំណេះវិជ្ជាខ្ពង់ខ្ពស់ប្រសើរជាងគ្រូអារទកាលាមៈតាបស និងដែលអាចបង្រៀនព្រះអង្គបានតទៅទៀត ។

**១០៣-** ក្រោយមកព្រះសិទ្ធត្ថទ្រង់បានដឹងថា មានតាបសម្នាក់ឈ្មោះ **ឧទកភាមបុត្រ** មានចំណេះវិជ្ជាខ្ពង់ខ្ពស់ឧត្តុង្គឧត្តម ព្រមទាំងមានចរិតលក្ខណៈ ប្រកបដោយគុណសម្បត្តិល្អក្រៃលែង ។ ដូច្នេះព្រះអង្គទ្រង់យាងទៅកន្លែងឧទកភាមបុត្រតាបសនោះ ទ្រង់បានសុំធ្វើជាសិស្សរបស់គាត់ បានសិក្សារៀនសូត្រ និងប្រតិបត្តិដោយគោរពរហូតដល់មានការចេះដឹង ហើយនិងសមត្ថភាពស្មើនឹងគ្រូរបស់ព្រះអង្គ ។ ឧទកភាមបុត្រតាបសស្រឡាញ់ពេញចិត្តព្រះសិទ្ធត្ថណាស់ដោយបានសរសើរអំពីបញ្ញា និងទេពកោសល្យដ៏វាងវៃរបស់ព្រះអង្គ ។ ហើយតាបសបានសុំឱ្យព្រះអង្គគង់នៅទីនោះជាមួយខ្លួនដើម្បីជួយបង្រៀនដល់សិស្សរបស់ព្រះគាត់ ។

**១០៤-** ប៉ុន្តែព្រះអង្គនៅមិនទាន់សព្វព្រះទ័យទាំងស្រុងចំពោះការបង្រៀនរបស់ឧទភាមបុត្រតាបសនៅឡើយទេ ។ អ្វីដែលគាត់បានបង្រៀនពិតជាការល្អប្រសើរជាងការបង្រៀនរបស់អារទកាលាមៈតាបសមែន ។ ការហាត់រៀនជាមួយឧក្រភាមបុត្រអាចធ្វើឱ្យចិត្តបានស្ងប់ចេញចាកពីវត្ថុ និងអារម្មណ៍ទាំងឡាយបាន ។ តាមសភាវៈចិត្តបែបនេះ គេពិបាកនិយាយថា មានឬមិនមានសញ្ញាបានឡើយ (មានសញ្ញាមិនមាន) **(នេវសញ្ញានាសញ្ញាយតនៈ)** ។ ទោះជាយ៉ាងនេះក្តី តែគេនៅតែយល់មិនបានច្បាស់លាស់អំពីបញ្ហាដែលចេះតែនាំឱ្យកើតមានការកើត និងស្លាប់ដដែល ។ ព្រោះហេតុដូច្នោះ ព្រះសិទ្ធត្ថទ្រង់ក៏បានយាងចេញពីសំណាក់របស់ឧទកភាមបុត្រទៀត ។ ហើយពេលនោះ ព្រះអង្គទ្រង់សំរេចព្រះទ័យថា ទ្រង់ឈប់សិក្សានៅទីណាៗទាំងអស់ ក្រៅតែពីស្វែងរកសច្ចធម៌ឱ្យដល់ទីបំផុតតាមមធ្យោបាយនៃព្រះបញ្ញា និងការខំព្យាយាមរបស់ព្រះអង្គផ្ទាល់តែប៉ុណ្ណោះ ។

**១០៥-** នៅក្នុងសម័យនោះ មានសមណជាច្រើនមកពីវណ្ណៈផ្សេងៗក្នុងប្រទេសឥណ្ឌា ដែលបានលះបង់ទ្រព្យសម្បត្តិគ្រួសារមកប្រព្រឹត្តិទុក្ករកិរិយា ។ ពួកអ្នកទាំងនោះមានជំនឿថា តាមរយៈការអត់ អាហារ ឬក៏ធ្វើទារុណកម្មដល់រាងកាយ គេនឹងបានទៅចាប់កំណើតថ្មីនៅឋានសួគ៌ជាកន្លែងដែលប្រកបដោយសេចក្តីសប្បាយរីករាយ សុខក្សេមក្សាន្តគ្មានទីបំផុត ហើយការធ្វើដូច្នេះ ពួកគេត្រូវរងទុក្ខវេទនា យ៉ាងខ្លាំងក្នុងពេលបច្ចុប្បន្ន តែគេក៏នៅត្រូវបានទទួលសេចក្តីសុខនាពេលអនាគត ។ ដូច្នេះហើយជនទាំងឡាយនោះខំប្រតិបត្តិយ៉ាងតឹងរ៉ឹងតាមការ ប្រព្រឹត្តធ្វើខ្លួនឱ្យលំបាកវេទនាដោយប្រការផ្សេងៗ ។

(តទៅលេខក្រោយ)

❖ Original Illuatration and Naration in Thai by Gunapayuta.
❖ Translation into English by A Lu.
❖ Coloring by Yann Fang Lee
❖ Translation into Khmer by Bhikkhu Kong Am.

**102-** What the sage Arada-kalama had taught Siddhartha consisted mainly of the knowledge of meditation, the way to made the very tranquil in order to eliminate all consciousness about existence in any realm (Akimcanyayatana), and then how to remain in the joy of Samadhi. But this kind of knowledge was neither thorough nor ultimate. It failed to satisfy Siddhartha, for is did not provide an answer to the problems of life and death, old age and sickness that had constantly occupied his mind. For this reason Siddhartha finally departed again to seek someone who might have higher knowledge that Arada-kalama and who would be able to teach him more.



**103-** Later, Siddhartha learned that an old sage named Udraka-ramaputra had profound learning and a highly virtuous character. So he approached Udraka-ramaputra. He became his pupil, and studied and practiced devotedly until his knowledge and capability were equal to his master's. Udraka-ramaputra also became very fond of Siddhartha, admiring his intelligence and talent, and urged him to stay and help him teach his disciples.



**104-** But Siddhartha was not completely satisfied with Udraka-ramaputra teaching. What he taught was, indeed, higher than Arada-Kalama's teaching had been. Practicing with Udraka-ramaputra enabled one to silence ones mind so that he could be completely detached from all things, ideas and feeling. In such a mental state one could hardly say that one existed nor exist (Naiva-samjna-nasamjnayayatana). Even so, one still could not clearly understand the ever-present problem of life and death. Therefore, Siddhartha left Udraka-ramaputra´s place also, and now be decided to stop visiting and learning here and there, around and about, but to search for the ultimate truth by means of his own wisdom and effort instead.



**105-** In that era, just as in modern times, there were many Sramanas of various cults in India who renounced their families to practice asceticism. They believed that by starving themselves or tormenting their physical bodies, they would be reborn in the heavenly states amid eternal pleasure, and that the more they suffered during the present life, the more pleasure they would be rewarded with in the future. So they practiced hardship by indulging in all kinds of tough an strenuous acts. *(Continued After Issue)*



# អាថ៌កំបាំង និងសិល្បៈនៃជីវិត
# SECRET AND ART OF LIVING



(តមកពីលេខមុន)

រៀបរៀងដោយ

លោក ម៉ៅ ច័ន្ទសំណុំ

**(9) ការពិសោធន៍ក្នុងសមាធិ**

បើនរណាម្នាក់សួរខ្ញុំថា «តើអ្នកពិសោធឃើញខ្មោច ព្រាយ បិសាច ឬឋានសួគ៌ ឋាននរកដូចខ្មែរយើងខ្លះបាននិយាយតៗគ្នាមក ឬយ៉ាងណានៅពេលសមាធិ? តើសមាធិនាំផលអ្វីដល់អ្នកនៅពេលឥឡូវនេះ ?» ។

- ទេ! ខ្ញុំពុំពិសោធឃើញ ព្រាយ បិសាចឬឋានសួគ៌ដូចពោលខាងលើនេះឡើយ ។ បើលោកអ្នកសមាធិទៅដល់តំបន់កុងស្សៀនសបរិសុទ្ធនឹងពិសោធឃើញបាតុភូតលំហ (Space) ដែលក្នុងកន្លែងនោះអ្នកឋិតនៅដាច់ផុត ឯករាជ្យ គ្មានអ្វីអាចទៅប៉ះអ្នកឡើយ (transcendent experience) ។ អារម្មណ៍សៅហ្មង ការរំជួលចិត្ត កំហឹង ការភ័យតក់ស្លុត ការព្រួយបារម្ភ ទុក្ខក្រៀមក្រំ អួលណែន ច្រណែន ប្រច័ណ្ឌ គំនុំ គំគួន ស្រេះ កង្វល់ក្នុងចិត្ត ការអៀនខ្មាស់រលាយបាត់អស់ប្រៀបដូចជាអ័ព្ទត្រូវពន្លឺថ្ងៃដូច្នោះឯង។ លុះស្រទាប់សៅហ្មងទាំងពួងរលាយបាត់អស់បណ្តលរបស់ជីវិត ឬកុងស្សៀនស (life or consciousness or being) ផុះចែងចាំងរស្មីឡើងដោយឯកឯង ។ ពេលនេះមេត្តាឥតព្រំដែនចែងចាំងលេចអណ្តែតមកផ្ទៃលើនៃចិត្តមនុស្ស។ មនុស្សបានពិសោធជីវិតប្រកបដោយសុភមង្គលខ្ពស់បំផុតតាមរយៈ គុណភាពថ្មីនៃចិត្តមនុស្ស (ការអនុគ្រោះទោសពៃចំពោះខ្លួន និងអ្នកដ៏ទៃ ការដឹងគុណ សន្តិភាព ផ្លូវចិត្ត បរមសុខ)។ បូរាណប្រៀបធៀបបាតុភូតទាំងនេះទៅនឹងរូបភាពខ្សែទឹក អូរ បឹង ស្ទឹង ព្រែក ទន្លេ ខ្សែទឹកទាំងអស់នេះហូរចាក់ទៅសមុទ្រ។ លុះចូលដល់ក្នុងសមុទ្រវាប្រែក្លាយទៅជាទឹកសមុទ្រទាំងអស់លែងសំគាល់ថាខ្លួនវាជាទឹកទន្លេ ឬស្ទឹងដូចមុនទៀតហើយ (to be merged or united with the ocean). (ទីនេះ ទីលំហនេះ គ្មានអត្តបុគ្គលិកទេ no sense of individual or ego of mind គ្មានម៉េម៉ូរី គ្មានមនុស្សឈ្មោះ «សំណុំ» ឬ «សុខ» ឬ«សៅ» ឡើយ ជាបុគ្គលដ៏បរិសុទ្ធ (Impersonal , Pure and absolute) ដែលសាសនា នានាតែងឱ្យនិយមន័យថាជា «ព្រះអាទិទេព» ក្នុងខ្លួនយើងជាមនុស្សម្នាក់ៗនេះ។ អ្នកប្រតិបត្តិសមាធិពិសោធឃើញបាតុភូតបែបនេះដោយផ្ទាល់ឃើញពិតៗនូវការរួចរំដោះពីទុក្ខរាប់រយជំពូកនៃជីវិត។ គេបានឃើញពន្លឺព្រះនិព្វានភ្នែកស្រស់ (ចំពោះអ្នកកាន់ព្រះពុទ្ធសាសនា)។ ពិសោធបែបនេះមនុស្សជាច្រើនជំនាន់បានទៅដល់ ហើយដាក់ឈ្មោះផ្សេងៗគ្នា ដូចជា សាតូរី Satori (ជប៉ុន), មុកទី Mukti (ហិណ្ឌូ), ព្រះវរបិតានាឋានសួគ៌ The Father in Heaven (គ្រីស្តសាសនា), ព្រះអាឡា (Allah) សាសនា អ៊ីស្លាម, ព្រលឹងដ៏មហិមា (The great spirit) សាសនាជនជាតិឥណ្ឌានៅទ្វីបអាមេរិក ។ល។ នេះជាឱសថទិព្វសំរាប់ព្យាបាលរោគផ្លូវចិត្តគ្រប់យ៉ាងចំពោះមនុស្សយើងគ្រប់រូប និងអំណោយផលដល់សង្គមទាំងមូល និងជាបុព្វហេតុឈានទៅកសាងសន្តិភាពសកលលោកទៀតផង ។

**ការពន្យល់បាតុភូតលំហក្នុងខ្លួននេះ (នៅពេលប្រតិបត្តិសមាធិ) :**

សំណួរមួយចំនួនចោទឡើង : តើលំហនោះមកពីណា ? តើហេតុអ្វីកើតលំហក្នុងខ្លួននៅពេលមនុស្សប្រើវិធីសមាធិ ? តើការប្រតិបត្តិសមាធិអាចបង្កើតលំហរបៀបណា ?

សូមពិនិត្យ ដំណើរប្រព្រឹត្តទៅនៃសញ្ញាក្ខន្ធរបស់មនុស្សយើង។ ក្នុងភាសាអង់គ្លេសសញ្ញាក្ខន្ធ គេហៅថា Perception មានន័យថា ការដឹងការយល់ក្នុងខ្លួនមនុស្ស ការទទួលអារម្មណ៍ ។ មនុស្សដឹងនឹងយល់ក្នុងខ្លួន to perceive តាមរយៈវិញ្ញាណទាំង៥ មានភ្នែក ត្រចៀក ច្រមុះ អណ្តាត ស្បែក និងញាណមួយទៀតគឺ ម៉េម៉ូរី (Memory from human mind) ។ សញ្ញាក្ខន្ធនេះមានដំណើរការប្រៀបដូចជាការឆ្លុះបញ្ចាំងកញ្ចក់កុងស្សៀនសរបស់មនុស្សទៅលើកម្មវត្ថុនានានៅក្រៅនិងក្នុងខ្លួនមនុស្ស (Reflection of consciousness over its object ) ។ ឧទាហរណ៍ការមើលសៀវភៅកញ្ចក់កុងស្សៀនសឆ្លុះបញ្ចាំងពាក្យអក្សរទាំងឡាយលើក្រដាស់ចូលមកក្នុងខ្លួន តាមរយៈភ្នែកចូលមកក្នុងខួរក្បាល ហើយខួរក្បាលបន្តទៅដល់បន្ទប់ម៉េម៉ូរី និងប្រាជ្ញា គឺបន្ទប់ម៉េម៉ូរីនេះហើយដែលខ្ទាត់មកវិញនូវការយល់ដឹងសព្វយ៉ាង (ដូចខ្ញុំពិពណ៌នាក្នុងកុងស្សៀនសនៅពេលដឹងខ្លួនស្រាប់) ។ ការឆ្លុះបញ្ចាំងកុងស្សៀនសតាមរូបមន្ត = អក្សរលើក្រដាស (កម្មវត្ថុ) ភ្នែក + ខួរក្បាល + បាជ្ញា + ម៉េម៉ូរី ការយល់ដឹង (លទ្ធផលកើតឡើងក្នុងខ្លួនមនុស្ស) ។ ការយល់ដឹងឬអារម្មណ៍នានា (Perception) ដែលផុះឡើងក្នុងកុងស្សៀនសមនុស្សនេះ គេអាចប្រៀបធៀបបាតុភូតនេះដូចជារលកដែលផុះឡើងក្នុងមហាសមុទ្រដោយកម្លាំងខ្យល់បក់។ ដំបូងវាមានរូបភាពធំស្កឹមស្កៃបន្ទាប់មកវាមានចលនារួញតូចទៅៗ ហើយរលាយខ្លួនបាត់តែម្តង (វារត់ប្រដេញទៅមាត់ច្រាំង) និងមានរលកនានាលេចឡើងធ្វើដំណើរតៗគ្នាពុំដាច់។ (រលកគឺ អារម្មណ៍ គំនិត មនោសញ្ចេតនា ប្រតិកម្ម ការរំជួលចិត្ត ហើយមហាសមុទ្រគឺ កុងស្សៀនសទាំងមូល)។ ក្នុងភាសាសាមញ្ញយើងធ្លាប់ឮសូរគេប្រើពាក្យ «រលកចិត្ត រលកអារម្មណ៍ រលកគំនិត រលករំជួលចិត្ត The wave of emotions »។ បើរលកណាមួយលេចក្នុងចិត្តហើយៗ មានសភាពធំស្កឹមស្កៃ គឺវាលាតសន្ធឹងគ្របដណ្តប់ពាសពេញតួចិត្តទាំងមូលនាខណៈនោះ that wave becomes predominant at that moment គ្មានរលកអារម្មណ៍ផ្សេងទៀត អាចជ្រៀតចូលបានឡើយ វាវាំងទីម្នាក់ឯងនៅទីនោះ ។ លុះរលកនេះតូចទៅៗ ទើបរលកដទៃងើបមកជំនួស។ បាតុភាពនេះ យើងតែងពិនិត្យឃើញឧទាហរណ៍ក្នុងពេលមនុស្សមានកំហឹង ។ បើនរណាខឹងហើយ គេស្តាប់អ្វីលែងបាន ពីព្រោះរលកកំហឹងវាគ្រប់គ្រងចិត្តមនុស្សទាំងមូល។ នៅខណៈនោះ កំហឹងមានវត្តមានទោលម្នាក់ឯង (it occupies the whole space of human mind for that moment )។

សមាធិក្នុងលោកយើងនេះមានវិធីប្លែកៗជាច្រើនយ៉ាង។ (តទៅលេខក្រោយ)

តមកទំព័រទី ០១

# ទិវាបុណ្យកំណើតព្រះយេស៊ូវ...

តាមពង្សាវតា ទិវាបុណ្យកំណើតព្រះយេស៊ូវគ្រីស្ទ Christmas ឬ Noël នេះ គឺជាបុណ្យសាសនានៃគ្រីស្ទបរិស័ទ នៅពេញពិភពលោកទាំងមូល ត្រូវតែនាំគ្នាប្រារព្ធធ្វើជារៀងរាល់ឆ្នាំ នៅក្នុងព្រះគម្ពីរបរិសុទ្ធ ដូចមានចែងជាអាទិ នៅក្នុងព្រះគម្ពីរសញ្ញាចាស់ ដោយហោរានៃព្រះអម្ចាស់ឈ្មោះ អេសាយ ដែលព្រះអម្ចាស់បានសំដែងបណ្ដាលឱ្យលោកអេសាយដឹង ហើយក៏កត់ត្រាទុកថា : "ដូច្នេះព្រះអម្ចាស់ទ្រង់នឹងប្រទានទីសំគាល់មួយមកអ្នករាល់គ្នា ដោយព្រះអង្គទ្រង់មើលនាងព្រហ្មចារី និងមានគភ៌ប្រសូត្របានបុត្រាមួយ ហើយនិងឱ្យព្រះនាមថា អេម៉ាញ៉ូអែល។ បុត្រនោះនឹងបរិភោគខ្លាញ់ទឹកដោះ ហើយនិងរទឹកឃ្មុំដរាបដល់ចេះបដិសេធន៍ចោលរបស់អាក្រក់ ហើយរើសយករបស់ល្អវិញ"។ ព្រះទ្រង់ប្រទានបុត្រាមកយើងហើយ ឯការគ្រប់គ្រងនឹងនៅលើស្មារបស់បុត្រានោះ ហើយគេនឹងហៅព្រះនាមទ្រង់ថា ព្រះដ៏ជួយគំនិតយ៉ាងអស្ចារ្យ ព្រះដ៏មានព្រះចេស្ដា ព្រះវរបីតាដ៏គង់នៅអស់កល្ប និងជាម្ចាស់នៃមេត្រីភាព"។

ក្នុងព្រះគម្ពីរ ម៉ាថាយ បានចែងថា "រីឯកំណើតព្រះយេស៊ូវគ្រីស្ទ នោះបានកើតមកយ៉ាងដូច្នេះ គឺនាងម៉ារា មាតាទ្រង់ កាលដែល យ៉ូសែប បានដណ្ដឹងនាងហើយ នោះនាងមានគភ៌ដោយព្រះវិញ្ញាណបរិសុទ្ធ មិនដែលបាននៅជាមួយគ្នា។ ពេលនោះស្រាប់តែមានទេវតានៃព្រះអម្ចាស់លេចមកពន្យល់សប្តិប្រាប់យ៉ូសែប កុំឱ្យខ្លាចនឹងយកនាងម៉ារាជាប្រពន្ធអ្នកឡើយ ដ្បិតដែលមកចាប់ទំផ្ទៃនាងនោះកើតពីព្រះវិញ្ញាណបរិសុទ្ធទេ នាងនឹងប្រសូត្របុត្រា ១ ហើយអ្នកត្រូវថ្វាយព្រះនាមថា "យេស៊ូវ" ព្រោះបុត្រនោះ នឹងជួយសង្គ្រោះរាស្ត្រទ្រង់ឱ្យរួចពីបាប។ ហោរា អេសាយ ថាព្រះនាមបុត្រនោះ ត្រូវហៅថា អេម៉ាញ៉ូអែល ដែលត្រូវប្រែថា ព្រះអង្គទ្រង់គង់ជាមួយនឹងយើងខ្ញុំ"។

កាលព្រះយេស៊ូវគ្រីស្ទ ទ្រង់ប្រសូត្រមកនៅភូមិបេថ្លេហ៊ឹម ស្រុកយ៉ូដា ក្នុងរាជ្យស្ដេចហេរ៉ូឌ។ នៅពេលនាងម៉ារាមានគភ៌គ្រប់ខែ ស្ដេចសេសារ អូគូស្ទបានចេញបញ្ជាឱ្យមនុស្សទាំងអស់ទៅស្រុកកំណើតដើម្បីចុះបញ្ជីឈ្មោះ។

យ៉ូសែប បាននាំនាងម៉ារា ទៅកាន់ភូមិបេថ្លេហ៊ឹម នៅស្រុកកំណើត។ ពេលទៅដល់ យ៉ូសែប រកកន្លែងស្នាក់នៅពុំបានទេ ទើបទៅសុំស្នាក់នៅក្នុងរោងក្រោលសត្វ ហើយនាងម៉ារា ត្រូវបានប្រសូត្របុត្រក្នុងក្រោលសត្វនោះ រួចហើយរំនឹងសំពត់ផ្ដេកក្នុងស្នូកដាក់ចំណីសត្វ។ ពេលនោះទេវតានៃព្រះបានទៅប្រាប់ពួកអ្នកគង្វាលយាមសត្វចៀមនៅឯវាលក្នុងវេលាយប់ថា ដ្បិតនៅថ្ងៃនេះ មានព្រះអង្គសង្គ្រោះ ១អង្គប្រសូត្រ ។

ពួកគេក៏ទៅជាប្រញាប់ ឃើញម៉ារា និងយ៉ូសែប ព្រះទាំងព្រះឱរស ផ្ដេកក្នុងស្នូកមែន រួចហើយវិលត្រឡប់ទៅវិញ ទាំងសរសើរតំកើងដល់ព្រះ ដោយព្រោះគ្រប់ការទាំងនោះ ដែលបានឮហើយឃើញ ដូចជាទេវតាបានប្រាប់មក។

ដូច្នេះពួកគង្វាលហ្វូងចៀមទាំងនោះហើយដែលបាននាំគ្នាទៅប្រាប់ដំណឹងដល់មហាជនហើយបានប្រារព្ធធ្វើបុណ្យកំណើតព្រះយេស៊ូវគ្រីស្ទ គ្រីស្ទម៉ាស ឬណូអែលនេះមុនគេបង្អស់។

ក្នុងរយៈពេលដែលព្រះយេស៊ូវគ្រីស្ទ បានប្រសូត្រមកហូតដល់ពេលព្រះអង្គយាងត្រឡប់ឋានសួគ៌វិញ ព្រះអង្គយេស៊ូវគ្រីស្ទ បានបំពេញព្រះកិច្ចការព្រះអង្គឱ្យបានសមស្របទៅតាមព្រះហឫទ័យព្រះវរបីតា បានចាត់ព្រះអង្គមក ហើយព្រះអង្គបានត្រូវទទួលរងទុក្ខទោសលំបាកវេទនាខ្លាំងណាស់ ពីជនដែលទទឹងទាស់នឹងព្រះអង្គដោយសារតែសេចក្ដីសន្ដោសប្រោសប្រណី មេត្តាករុណា និងផ្ដល់នូវសេចក្ដីសង្គ្រោះ ឱ្យមានជីវិតអស់កល្បដល់អស់អ្នកណាដែលជឿដល់ព្រះនាមទ្រង់ និងគោរពប្រណិបត្តិ ដើរតាមព្រះអង្គដោយគ្មានងាករេចេញពីព្រះអង្គឡើយ។

សម័យថ្ងៃមួយ មានជនអន្ធពាលទទឹងច្បាប់ជាច្រើនបានព្យាយាមរកចាប់កំហុសព្រះអង្គយេស៊ូវ ដែលបំពានរហូរចាប់បញ្ជូនព្រះអង្គឱ្យមានទោសធ្វើបាប វាយដុំច្រំផាក់ ស្រែកជេរ ប្រមាថកាតទានវាយវត់លើព្រះកាយ ហែកឈាមសែនឈឺចុកចាប់ ប៉ុន្តែព្រះអង្គជាព្រះពិត តែមួយជាព្រះដ៏បរិសុទ្ធពិតប្រាកដ ព្រះអង្គពុំបានតបត ហើយស៊ូទ្រាំអត់ធន់សុខព្រះទ័យ ដើម្បីសងលោះអំពើបាបទាំងអស់នៃមនុស្សដែលត្រូវធ្លាក់លើព្រះអង្គ រហូតដល់ព្រះអង្គស៊ូលះបង់ព្រះជន្មាជំនួសបាបទាំងអស់នៃមនុស្សក្នុងលោកីយ៍ទាំងមូល នៅលើឈើឆ្កាង ខ្នងភ្នំរលាក្បាលកាល់វ៉ារី។

ព្រះអង្គយេស៊ូវ បានសុគតនៅថ្ងៃសុក្រ ប៉ុន្តែបីថ្ងៃក្រោយ គឺថ្ងៃអាទិត្យ ព្រះអង្គមានព្រះជន្មរស់ឡើងវិញ ។

ក្រោយពីព្រះអង្គយេស៊ូវគ្រីស្ទ បានបំពេញព្រះរាជកិច្ចការចប់សព្វគ្រប់ហើយ ព្រះវរបីតាបានលើកព្រះអង្គទៅនគរឋានសួគ៌វិញ ហើយគង់នៅក្នុងព្រះអម្ចាស់រហូតអស់កល្ប ហើយព្រះសន្យាថានឹងបញ្ជូនវិញ្ញាណបរិសុទ្ធព្រះអង្គឱ្យមកគង់សណ្ឋិតជាមួយអ្នកណាដែលស្គាល់ និងជឿស៊ប់ដល់ព្រះដល់ព្រះនាមទ្រង់។

គ្រីស្ទបរិស័ទពេញពិភពលោកនាំគ្នាប្រារព្ធពិធីបុណ្យរំឮកខួបកំណើតព្រះយេស៊ូវគ្រីស្ទ ក្នុងក្ដីសប្បាយរីករាយ ក្នុងក្ដីអំណរ ។

សូមមានអំណរ និងសប្បាយរីករាយបុណ្យគ្រីស្ទម៉ាស ឬណូអែលឆ្នាំ ២០១០!

សំដែងជូនដោយលោក ម៉ម យិន ក្រុមជំនុំគ្រីស្ទបរិស័ទខ្មែរ បាប់ទីស្ទ ក្រុងហ្វីឡាដែលហ្វីយ៉ា សហរដ្ឋអាមេរិក៕

សូមអរព្រះគុណ!
សូមអរគុណ!

ទស្សន៍ទាយជោគតារាសី

# ជោគជតារាសីលោកអ្នក ថ្ងៃទី២៣ ធ្នូ ២០១០-១៣ មករា ២០១១



**ឆ្នាំជូត : (ពពួកទេវតាប្រុស ធាតុទឹក)**

រាសីលោកអ្នកឡើងខ្ពស់ត្រដែត។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អណាស់ ។ ក្នុងរយៈពេលនេះលោកអ្នកមានអារម្មណ៍ភ្លឺថ្លា គំនិតប្រាជ្ញាឈ្លាសវៃ ទោះបានប្រកបកិច្ចការងារអ្វីៗក៏ដោយ ក៏អាចទទួលបានផលសម្រេចសមតាមបំណងប្រាថ្នាទាំងអស់ តែចូរកុំមានចិត្តលោភលន់ឲ្យសោះ ព្រោះការលោភលន់នាំមកនូវក្តីវិនាសអន្តរាយ។ ចំពោះគូស្នេហ៍មានភាពល្អកល្អិនយល់ចិត្តគ្នាល្អណាស់ ៕



**ឆ្នាំឆ្លូវ : ( ពពួកមនុស្សប្រុស ធាតុដី )**

រាសីលោកអ្នកល្អជាមធ្យម។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ គឺអាចទទួលបានផលសម្រេចត្រឹមតែពាក់កណ្តាលប៉ុណ្ណោះ ដូច្នេះលោកអ្នកមិនត្រូវហ៊ានប្រថុយប្រថានបណ្តាក់ទុនរកស៊ីដោយទ្រង់ទ្រាយធំឡើយ ។ ចំពោះគូស្នេហ៍មានភាពស្និទ្ធស្នាលដូចសព្វមួយដង ៕



**ឆ្នាំខាល : ( ពពួកយក្សស្រី ធាតុឈើ )**

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ ចូរកុំធ្វេសប្រហែសឲ្យសោះជាពិសេសចំពោះអាជីវករអ្នករកស៊ីលក់ដូរមុននឹងប្រគល់ឬទទួលនូវមុខទំនិញសព្វសារពើ ចូរចេះពិនិត្យមើលគុណភាព និងរាប់ចំនួនឲ្យបានត្រឹមត្រូវ ។ ចំពោះគូស្វាមីភរិយាចូរប្រយ័ត្នអ្នកក្រៅមកញុះញង់ ៕



**ឆ្នាំថោះ : ( ពពួកមនុស្សស្រី ធាតុឈើ )**

រាសីលោកអ្នកល្អមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះថ្វីត្បិតតែការងាររកស៊ីអាចរីប ៗបន្តិចឡើងវិញក្តី តែអ្វីដែលលោកអ្នកគួរប្រយ័ត្នប្រយែងនោះ គឺនឹងមានមនុស្សសម្តីផ្អែមបង់បោកប្រាស់តាមគ្រប់រូបភាព ដូច្នេះទាំងបុរសស្ត្រី គឺមិនត្រូវឆាប់ត្រចៀកទន់ជឿទុកចិត្តគេពេកទេ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះប្រកបតែសេចក្តីសុខនឹងគ្នា ៕



**ឆ្នាំរោង : (ពពួកទេវតាប្រុស ធាតុមាស)**

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខដោយសន្សឹម ៗ ។ ក្នុងរយៈពេលនេះដោយទំនាយទាយថា អាចបង់ខាតទ្រព្យខ្លះៗនោះ ដូច្នេះចូរកុំឲ្យគេខ្ចីរបស់របរមានតម្លៃឲ្យសោះ ព្រោះកាលបើបានធ្លាក់ដល់ដៃគេហើយ គឺគ្មានថ្ងៃបានវិលត្រឡប់វិញឡើយ ។ ចំពោះគូស្វាមីភរិយាក្នុងរយៈពេលនេះមានផលប៉ះទង្គិចគ្នាបន្តិចបន្តួច ៕



**ឆ្នាំម្សាញ់ : (ពពួកមនុស្សប្រុស ធាតុភ្លើង)**

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបរឿងរកាំរកូសច្រើន ។ ក្នុងរយៈពេលនេះ បើមានរឿងឈ្លោះវិវាទកើតឡើង ចូរចេះអត់ធ្មត់ និងរម្ងាប់ចិត្តឲ្យបានត្រជាក់ ។ ចំពោះស្ត្រីភេទក្នុងរយៈពេលនេះមិនត្រូវនិយាយស្តីប៉ប៉ាច់ប៉ប៉ោចឥតបានការច្រើនពេកទេ ព្រោះរឿងរ៉ាវផ្សេងៗអាចកើតចេញពីពាក្យសម្តី ។ ចំពោះគូស្វាមីភរិយាចូរប្រយ័ត្នប្រយែងក្រែងមានអ្នកទីបីចូលជ្រៀតជ្រែក ៕



**ឆ្នាំមមី : (ពពួកទេវតាស្រី ធាតុភ្លើង)**

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបកិច្ចការងារអ្វីក៏ដោយ គឺរមែងតែបានទទួលផលសម្រេចសមតាមបំណងប្រាថ្នាទាំងអស់។ ក្នុងរយៈពេលនេះបុរសត្រូវប្រយ័ត្នចំពោះមនុស្សស្រីដែលមានសម្តីផ្អែមអាចរលាយទ្រព្យឆាប់។ ចំពោះគូស្នេហ៍ប្រកបតែសេចក្តីសុខក្សេមក្សាន្ត ៕



**ឆ្នាំមមែ : (ពពួកទេវតាស្រី ធាតុមាស)**

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ។ ក្នុងរយៈពេលនេះអ្វីៗច្រើនមានការប្រែប្រួលពុំទៀងទាត់ឡើយ។ ដូច្នេះបើលោកអ្នកមានទិញលក់ដីធ្លីផ្ទះ ឬវត្ថុមានតម្លៃផ្សេង។ ចូរធ្វើលិខិតស្នាមដោយមានចុះហត្ថលេខា ឬផ្តិតស្នាមមេដៃឲ្យបានត្រឹមត្រូវទើបទៅថ្ងៃមុខពុំមានបញ្ហាចោទឡើង។ ចំពោះគូស្នេហ៍ប្រកបតែសេចក្តីសុខក្សេមក្សាន្ត ៕



**ឆ្នាំវក : (ពពួកយក្សប្រុស ធាតុដែក)**

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ ថ្វីត្បិតតែមានភោគផលចំណូលហូរចូលច្រើនគួរសមក្តី តែពុំមានសល់អ្វីជាដុំកំភួនឡើយ ព្រោះចាយវាយខ្ជះខ្ជាយខ្លាំងពេក ហើយក៏មិនខុសពីទូកធំក្តោងធំនោះដែរ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះទាល់តែចេះអត់ឱនឲ្យគ្នាទៅវិញទៅមកទើបមិនអាចប្រេះឆាគ្នាបាន ៕



**ឆ្នាំរកា : (ពពួកយក្សប្រុស ធាតុដែក)**

រាសីលោកអ្នកល្អជាមធ្យម។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះអ្វីៗច្រើនមានការប្រែប្រួលពុំទៀងទាត់ឡើយ ដូច្នេះបើលោកអ្នកមានលក់ដីធ្លីផ្ទះសម្បែង ឬវត្ថុមានតម្លៃផ្សេង។ ចូរធ្វើលិខិតស្នាមជាលាយលក្ខណ៍អក្សរដោយមានចុះហត្ថលេខា ឬផ្តិតស្នាមមេដៃឲ្យបានត្រឹមត្រូវទើបទៅថ្ងៃមុខពុំមានបញ្ហាចោទឡើង។ ចំពោះគូស្នេហ៍មានភាពស្និទ្ធស្នាលដូចប្រក្រតី ៕



**ឆ្នាំច : ( ពពួកយក្សស្រី ធាតុដី )**

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងរឿងរកាំរកូសច្រើន ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ ចូររៀបចំគម្រោងជាមុនទើបពុំមានការថ្លោះធ្លោយ។ ក្រៅពីនោះបើមានរឿងឈ្លោះវិវាទកើតឡើង ចូរចេះអត់ធ្មត់ និងរម្ងាប់ចិត្តឲ្យបានត្រជាក់ទើបរឿងតូចមិនអាចក្លាយជារឿងធំបាន។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះច្រើនពាក់មុខយក្សដាក់គ្នា៕



**ឆ្នាំកុរ : (ពពួកមនុស្សស្រី ធាតុទឹក)**

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះថ្វីត្បិតតែការងាររកស៊ីរបស់លោកអ្នកបានជួបនឹងគូប្រជែងដ៏ខ្លាំងយ៉ាងណាក្តីក៏មិនភ័យព្រួយអ្វីដែរ ព្រោះលោកអ្នកមានប្រៀបឈ្នះជាប់ជានិច្ច ។ ចំពោះកំលោះក្រមុំក្នុងរយៈពេលនេះអាចទាក់ទងគ្នានឹងបានក្លាយជាគូស្នេហ៍ដ៏ប្រពៃមួយគូ ៕

សោភ័ណភាព

# បំបាត់អាការពពាលស្បែក ត្រូវចេះការពារតាំងពីលេចចេញដំបូង

**ពេលអាការពពាលស្បែកបានលេចចេញមកដោយមិនអាចគ្រប់គ្រងបានស្ថិតនៅក្រោមឥទ្ធិពលនៃបរិស្ថានរួមជាមួយនឹងការប្រែប្រួលខុសធម្មតានៅក្នុងរូបកាយនោះអាការពពាលក៏នឹងរីករាលដាលយ៉ាងលឿនថែមឡើងជាមួយពេលដែលវាកាន់តែស៊ីជម្រៅទៅស្រទាប់ខាងក្នុងរបស់ស្បែក ។**

**ដើម្បីបំបាត់ស្នាមពពាលស្បែកនេះមធ្យោបាយមានតែធ្វើការឆ្លងកាត់ដំណាក់កាលដូចតទៅនេះ ÷**

**១-ធ្វើការកំចាត់ស្នាមពពាលពីខាងក្រៅដោយពុំចាំបាច់ប្រើប្រាស់ផលិតផលដែលមានអានុភាពខ្លាំងពេកទេ**



អ្នកអាចប្រើប្រាស់ផលិតផលព្យាបាលដ៏ពិសេសឈ្មោះ NEODERMA ដែលផលិតផលនេះមានសមាសភាគរបស់វារួមមាន AZELAIC AXID, KOJIC ACID, VITAMIN C ដើម្បីជួយធ្វើឲ្យកោសិកាស្បែកកើតឡើង ដើម្បីផ្លាស់ប្តូរស្រទាប់ស្បែកដែលចេញជាកោសិកាថ្មីមកទៀត ។ ក្រោមឥទ្ធិពលនៃការព្យាបាលដោយផលិតផលខាងលើនេះ គឺស្នាមពពាលនឹងរលុបជាបណ្តើរៗចាប់ពី៧ទៅ១០ដង ។ ទន្ទឹមគ្នានេះដែរ ការកកើតឡើងនូវជាតិ MELAMIN ក្នុងស្បែកក៏នឹងត្រូវបានកើតឡើងក្នុងកម្រិតមួយជាអតិបរមា ។

**២-ទប់ស្កាត់ស្នាមពពាលស្បែកចាប់ពីខាងក្នុងដោយសារពន្លឺ**

ពេលដែលពន្លឺពណ៌លឿងនៃប្រភេទពន្លឺ BIOLIGHT នឹងនាំឲ្យមានការភ្ញោចដល់គ្រាប់ឈាមក្រហមប្រកបដោយប្រសិទ្ធភាព ។ ដូច្នេះហើយទើបបានជាសារជាតិពុល ឬមានជាតិមិនល្អនៅក្នុងស្បែកត្រូវចេញមកខាងក្រៅស្បែក ។ ប្រភេទពន្លឺនេះក៏នឹងជះឥទ្ធិពលទៅដល់ប្រព័ន្ធប្រសាទ ហើយនាំឲ្យទទួលអារម្មណ៍ថាបានធូរស្បើយច្រើន កាត់បន្ថយអាការស្ត្រេសជួយធ្វើឲ្យដេកលក់ស្រួល ។ ជាមួយនឹងចំណុចដ៏ល្អប្រសើរយ៉ាងដូច្នេះ អាការពពាលក៏លែងកើតមានមកពីខាងក្នុងស្បែកតទៅទៀតដែរ ។

**៣-កែលំអសោភ័ណភាពស្បែកដែលរងរបួស និងស្តារស្ថានភាពស្បែកក្រោយពេលកំចាត់ស្នាមពពាលរួច**

ផលិតផលស្តារសោភ័ណភាព OXYJET LEO ជាមួយនឹងសមាសធាតុព្យាបាលស្នាមពពាលពិតជានឹងជួយធ្វើឲ្យអាហារដែលស៊ីជ្រៅចូលទៅក្នុងស្បែកជួយចិញ្ចឹមកោសិកាស្បែក បង្កើតជាកោសិកាថ្មីរួមទាំងជួយព្យាបាលដល់កន្លែងកើតរបួសស្នាមរួមទាំងទប់ស្កាត់មិនឲ្យអាការកើតមានជាថ្មីម្តងទៀត ៕



# ផាត់ម្សៅលុបស្នាមជ្រីវជ្រួញនៅលើផ្ទៃមុខ

•••ជាការពិតណាស់ថា ស្នាមជ្រីវជ្រួញនៅលើផ្ទៃមុខ គឺជាទុក្ខកង្វល់ដ៏ធំមួយសម្រាប់ស្ត្រីក្រោយពេលវ័យកាន់តែកើនច្រើនឡើងនោះ ។ ប្រសិនបើអ្នកកំពុងព្រួយបារម្ភពីស្បែកមុខឡើងជ្រីវជ្រួញ ហើយមិនដឹងធ្វើបែបណានោះ ខាងក្រោមនេះយើងនឹងណែនាំពីវិធីផាត់មុខលុបបំបាត់ស្នាមជ្រីវជ្រួញលើស្បែកមុខបែបអ្នកអាជីពមកផ្ញើជូនដូចតទៅ ÷

ដំហានដំបូងគេបង្ហស់អ្នកតោងប្រាកដនៅក្នុងចិត្តថា ខន់ស៊ីលឡឺដែលអ្នកត្រៀមនឹងប្រើនោះ វាមានពណ៌ប្រហាក់ប្រហែល និងពណ៌ស្បែក និងពណ៌ម្រនាប់ព្រោះបើមិនដូច្នេះទេ ជំនួសឲ្យការលុបបំបាត់ស្នាមនៅលើស្បែកមិនបានជោគជ័យ ហើយនោះ វាបែរជាការជួយជម្រុញឲ្យស្នាមជ្រីវជ្រួញទាំងអស់នោះលេចកាន់តែច្បាស់ជាងមុនទៅទៀត។ ក៏ប៉ុន្តែគេគួរធ្វើបែបណាទើបដឹងបានថា ពណ៌នោះវាប្រហាក់ប្រហែលគ្នា? នោះគឺណែនាំឲ្យផាត់វាសាកល្បងពីលើម្សៅម្រនាប់ ប្រសិនបើមើលមិនឃើញទេ បញ្ជាក់ថាពណ៌នោះអាចប្រើការបាន។ មួយវិញទៀតប្រសិនបើមានបំណងលុបបំបាត់ស្នាមដាំខ្មៅនៅក្រោមត្របកភ្នែកណែនាំឲ្យជ្រើសរើសពណ៌ស្លេកជាងស្បែករបស់អ្នកទុកមួយពណ៌ ។

បន្ទាប់មកប្រើម្សៅម៉ដ្ឋលាបនៅត្រង់បរិវេណដែលត្រូវប្រើខន់ស៊ីលឡឺ ដើម្បីការពារមិនឲ្យហៀរប្រតេកប្រតាកព្រមទាំងជួយការពារឲ្យម្សៅជាប់បានយូរជាងមុនទៀតផង ។ ចំណែកអ្នកត្រូវការលុបបំបាត់ស្នាមពណ៌ក្រហម ហើយបំណងឲ្យស្បែកមានសភាពពណ៌ស្មើគ្នាល្អនោះ ណែនាំឲ្យប្រើខន់ស៊ីលឡឺពណ៌លឿង ឬពណ៌បៃតង រួចហើយផាត់លុបពីលើដោយម្សៅម៉ដ្ឋពណ៌លឿង ។

អ្នកឃើញហើយថា សូម្បីវិធីងាយៗបែបនេះក៏អាចធ្វើឲ្យស្បែកមុខរបស់អ្នកស្អាតជូរជង់គ្មានកន្លែងណាគួរឲ្យទើសភ្នែកបានដែរ ៕

# ព្រះកេសលោកេស្វរៈត្រូវបានរកឃើញនៅក្នុងប្រាសាទបន្ទាយឆ្មារនៅបន្ទាយមានជ័យ

**ដោយ សាំង សុផន្នរិទ្ធ**

THE CAMBODIA DAILY

ក្រុមមន្ត្រីក្រសួងវប្បធម៌ និងវិចិត្រសិល្បៈបាននិយាយកាលពីម្សិលមិញថា ព្រះកេសចម្លាក់មួយដែលមានអាយុកាលតាំងពីសតវត្សរ៍ទី១៣ ត្រូវបានគេរកឃើញនៅក្នុងប្រាសាទបន្ទាយឆ្មារខេត្តបន្ទាយមានជ័យ ហើយត្រូវបានប្រគល់ឱ្យសារមន្ទីរជាតិអង្គរក្នុងខេត្តសៀមរាប ។

លោក ឃឹម សុធិន ជាមន្ត្រីនៅក្រសួងវប្បធម៌ និងវិចិត្រសិល្បៈបានមានប្រសាសន៍ថា ព្រះកេសលោកេស្វរៈទម្ងន់១៥គីឡូក្រាម ជាព្រះពោធិសាត់ដែលតំណាងឱ្យមេត្តាធម៌នៃអ្នកកាន់ព្រះពុទ្ធសាសនា ត្រូវបានប្រទះឃើញកាលពីថ្ងៃទី៨ ខែធ្នូ នៅខាងក្នុងគំនរបាក់បែកកម្ពស់៣២ម៉ែត្រ រួមជាមួយនឹងព្រះហស្តខាងឆ្វេងនៃចម្លាក់នេះ ។

លោកបានមានប្រសាសន៍ថា "ចម្លាក់នេះត្រូវបានរកឃើញនៅក្នុងកំផែងទី១ នៃប្រាសាទនេះ ដោយមានការជួយជ្រោមជ្រែងពីមូលនិធិបេតិកភណ្ឌពិភពលោក" ដោយលោកបន្ថែមថា បន្ទាប់មកបំណែកផ្សេងៗនៃចម្លាក់នេះ ត្រូវបានបញ្ជាឱ្យផ្ទេរទៅឱ្យសារមន្ទីរជាតិអង្គរ ។

លោក ឃឹម សុធិន បានមានប្រសាសន៍ថា "នេះជាព្រះកេសទី៣ នៃចម្លាក់មួយដែលយើងបានប្រទះឃើញអំឡុងការងាររបស់យើង ក្នុងការសង់ប្រាសាទដែលបានរងការបំផ្លិចបំផ្លាញទាំងស្រុងនេះឡើងវិញ" ដោយលោកបន្ថែមថា ដងខ្លួននៃចម្លាក់នេះនៅមិនទាន់បានរកឃើញនៅឡើយទេ ។

កាលពីខែកញ្ញា ព្រះកេសចម្លាក់ពីរផ្សេងទៀតត្រូវបានប្រទះឃើញនៅបាតគូទឹកមួយដែលព័ទ្ធជុំវិញប្រាសាទនេះ ។ បច្ចុប្បន្នព្រះកេសទាំងនោះត្រូវបានរក្សាទុកនៅក្នុងសារមន្ទីរខេត្តបន្ទាយមានជ័យ ៕

# Khmer Post Classified

# ស្ត្រីខ្មែរដំបូងបង្អស់ដែលបានធ្វើដំណើរពីប្រទេសបារាំងមកភ្នំពេញតាមផ្លូវគោក

(តពីលេខមុន)

ដោយ : ពិន នារីពិទូ

•••រថយន្តបានបោះពួយទៅមុខសន្សឹមៗក្បែរនឹងតំបន់ Lufeng ជាមួយនឹងលំហូរនៃកង់ម៉ូតូមិនឈប់ឈរនៅលើផ្លូវឆ្ពោះទៅមុខពួកយើងបានមកដល់ Guangzhou ដោយសុវត្ថិភាព។ Guangzhou ជាទីក្រុងដែលបានកើតឡើងតាំងពីសម័យមុនគ្រឹះស័ករាជ ទីក្រុងនេះមានឈ្មោះមួយទៀតហៅថាផ្កាវីកគ្រប់រដូវ ដោយសាររដូវក្តៅមានរយៈពេលវែងរុក្ខជាតិលាស់មានពណ៌បៃតងគ្រប់ទីកន្លែង និងបញ្ចេញផ្ការីកស្រស់ត្រកាលជារៀងរាល់ឆ្នាំ ហើយក៏ជាមជ្ឈមណ្ឌលគមនាគមន៍ដ៏សំខាន់ៗដូចជាស្ថានីយ៍អយស្ម័យយានដែលធ្វើចរាចរណ៍ជាច្រើនកន្លែងផ្លូវជាតិសំខាន់ៗ ស្ពាន និងផ្លូវទឹកខ្វាត់ខ្វែងដែលអាចចរាចរណ៍បានទៅគ្រប់ទិសទីតាមរយៈនាវាចម្លង។ Guangzhou ជាទីក្រុងដែលមានការវិវឌ្ឍន៍រីកចំរើនជាខ្លាំង និងជាមោទនៈភាពរបស់ខេត្ត Guangdong មានទីតាំងស្ថិតតាមបណ្តោយឆ្នេរកោះភាគខាងត្បូងប្រទេសចិន មានកំពង់ផែដ៏ល្អឥតខ្ចោះស្ថិតនៅតាមដងទន្លេ Pearl និងជាច្រកចេញទៅសមុទ្រចិនភាគខាងត្បូង។ តំបន់ដែលទាក់ទាញអ្នកទេសចរណ៍ខ្លាំងជាងគេ គឺរូបចម្លាក់សត្វចៀមទាំងប្រាំនៅសួនច្បារ Yuexiu TenøPearl និងភ្នំពពកស។ អ្នកធ្វើដំណើរផ្សងព្រេងទាំងពីរនាក់បានទទួលស្វាគមន៍យ៉ាងរាក់ទាក់ដោយម្ចាស់ផ្ទះទាំងពីរនាក់គឺអ្នកស្រី Long និងស្វាមី ដែលមានគេហដ្ឋាននៅជាយទីក្រុង Guangzhou។ យើងអាចធ្វើដំណើរទៅទីគ្រប់កន្លែងផ្សេងៗនៅទីប្រជុំជនបានតាមរយៈរថយន្តក្រុងនៅរៀងរាល់កន្លះម៉ោងម្តង ពួកយើងបានស្វែងរកតាក់ស៊ីនៅកន្លែងចំណតរថយន្ត ក្រោយមកបានសំរាកពេលរសៀលនៅលើកោះ Shamian ដែលមានទីតាំងក្បែរទន្លេ Pearl ដើរទស្សនាទេសភាពនៅតាមបណ្តោយដងទន្លេ Pearl មើលទៅគួរឱ្យភ្ញាក់ផ្អើលដោយកោះនេះធំល្វឹងល្វើយហួសពីការគិតទុក។ ថ្ងៃនេះគ្រួសាររបស់អ្នកស្រីឡុង Long បានរៀបចំអាហារពេលល្ងាចដ៏ពិសេសសំរាប់ពួកយើង លោកឡុងបានពិពណ៌នាថា នៅថ្ងៃអនាគតប្រទេសចិននឹងមានការអភិវឌ្ឍន៍យ៉ាងឆាប់រហ័សនូវក្នុងរយៈពេល២០ឆ្នាំខាងមុខដោយផ្អែកទៅលើកត្តាពីរ គឺការដឹកនាំល្អ និងនយោបាយរឹតបន្តឹងការផ្តល់កំណើតទារក។ ពង្រឹងប្រពន្ធ័អប់រំដោយផ្តល់ប្រាក់ខែបន្ថែមទៅឱ្យគ្រូបង្រៀនដើម្បីបញ្ចៀសនូវអំពើពុករលួយ គំនិតនេះគឺស្របពេលដែលស្រុកខ្មែរយើងកំពុងទាមទារនូវការអភិវឌ្ឍន៍ស្រដៀងគ្នានេះដែរ។ ព្រឹកនេះពួកយើងបានទៅស្ថានទូតវៀតណាមដោយបង់ប្រាក់ចំនួន១២០០យ៉ាន់ ស្មើនឹង១២០យូរ៉ូ ដើម្បីទទួលបាននូវទិដ្ឋាការ។ ពួកយើងបានដើរអស់១៥នាទីដើម្បីស្វែងរកចំណតរថយន្តឆ្ពោះទៅទីផ្សារ Quingping ដែលជាទីផ្សារធំជាងគេនៅក្នុងស្រុកដែលដាក់លក់នូវរុក្ខជាតិ ថ្នាំបុរាណចិនច្រើនប្រភេទ។ ពួកយើងបានបន្តដំណើរលើផ្លូវ DishipuLu ដែលក្រាលទៅដោយឥដ្ឋការ៉ូរលោងស្រិលសំរាប់អ្នកថ្មើជើងឆ្លងកាត់តែប៉ុណ្ណោះ ហើយផ្លូវនេះត្រូវបានចាត់ចូលក្នុងបញ្ជីកេរ្តិ៍ដំណែលជាតិ និងសំណង់ដ៏គួរឱ្យស្ញប់ស្ញែងអមសងខាងផ្លូវតាមបែបប្រពៃណីចិន។ នាថ្ងៃរសៀលពួកយើងបានទៅទស្សនាប្រាសាទបុព្វបុរសនៃរាជវង្សឈិន Chen ដែលបង្ហាញពីក្បាច់រចនាបទប្រាសាទនាសម័យកាលនោះ។

ថ្ងៃទី២៦ ខែតុលា ឆ្នាំ២០០៦ ថ្ងៃនេះពួកយើងបានមកដល់ទីក្រុងហុងកុង ដែលមានសំណង់អាគារខ្ពស់ត្រដែតឈរបង្ហូតរាងប្រហាក់ប្រហែលនឹងទីក្រុងញូវយ៉កដែរ ពួកយើងបានឆ្លងមកដល់ទីនេះតាមរយៈរថភ្លើងភាគខាងកើតទីក្រុង Guangzhou មក Kowloon និងជិះទូកចម្លងអស់រយៈពេល១០នាទីដើម្បីមកដល់ដែនកោះហុងកុង។ នៅចំកណ្តាលទីក្រុងហុងកុងជាមជ្ឈមណ្ឌលពាណិជ្ជកម្ម ទីផ្សារហ៊ុន។ល។ ពួកយើងបានចាប់ផ្តើមទស្សនាអាគារ Jadine ដែលមានកំពស់ខ្ពស់ជាងគេនៅក្នុងទីក្រុងនេះ សាងសង់ឡើងក្នុងឆ្នាំ១៩៧៣ និងដើម្បីរំលឹកនូវឈ្មោះលោក WilliamJadine ដែលបានរកឃើញដែនកោះនេះមុនដំបូង។ ទីក្រុងហុងកុង មានប្រជាជនរស់នៅជិត៧លាននាក់លើផ្ទៃដីប្រមាណ១.១១០គីឡូម៉ែត្រក្រឡា។ អាគារ VictoryPeak មានកំពូលខ្ពស់ជាងគេបំផុតនៅលើកោះនេះ និងល្បីល្បាញនៅលើពិភពលោក នៅចុងកំពូលនៃអាគារអាចមើលឃើញទស្សនីយភាពទាំងមូលនៃទីក្រុងហុងកុង និងទិដ្ឋភាពទីជម្រាលពណ៌ខៀវស្រងាត់ដែលតភ្ជាប់ទៅសមុទ្រចិនខាងត្បូងនៅលើកំពូលដ៏ខ្ពស់នៃអាគារមានភាពត្រជាក់ និងអាកាសធាតុចុះអ័ព្ទដូចព្រិលសគ្របដណ្តប់ពេញផ្ទៃមេឃ។ ពួកយើងបានភ្លក់រស់ជាតិអាហារពិសេសរបស់ជនជាតិចិន គឺនំតាវក្តៅៗដែលចំហុយនៅក្នុងប្រអប់ឫស្សី នៅទីនេះមានធាតុអាកាស និងបរិស្ថានល្អព្រមទាំងមានការផាកពិន័យតឹងរឹងចំពោះការចោលសំរាមឬស្តោះទឹកមាត់នៅតាមផ្លូវសាធារណៈ ចំណែកឯតំលៃទំនិញមានតំលៃថ្លៃគួរសម។

ថ្ងៃទី២៧ ខែតុលា ឆ្នាំ២០០៦ ពួកយើងបានចាកចេញពីទីក្រុង Guangzhou ឆ្ពោះទៅទីក្រុង Yulin ដើម្បីបន្តទៅប្រទេសវៀតណាមក្នុងចំងាយ៤០០គីឡូម៉ែត្រដោយបើកបរចំងាយ២០០គីឡូម៉ែត្រឆ្លងកាត់ផ្លូវសាងសង់រួច និងពាក់កណ្តាលទៀតគឺផ្លូវកំពុងសាងសង់ធ្វើឱ្យពួកយើងពិបាកក្នុងការបើកបរ។ ពួកយើងបានឆ្លងកាត់តាមភូមិស្រុកនានាទស្សនាទិដ្ឋភាពភាពចំការតែ វាលស្រូវស្រែដែលបង្ហាញពីសក្តានុពលផ្អែកកសិកម្មនៃភូមិភាគអាស៊ីអាគ្នេយ៍។ នៅតាមផ្លូវឆ្ពោះទៅទីក្រុង Yulin រថយន្តរបស់ពួកយើងបានជួបប្រទះឧបសគ្គមួយ គឺជាប់ផុង និងរណ្តៅដែលមិនអាចរំកិលទៅមុខបាន ប៉ុន្តែសំណាងល្អអ្នកបើកបររថយន្តតាក់ស៊ី បានជួយទាញដើម្បីវិលមកប្រក្រតីវិញ។

ថ្ងៃទី៣០ ខែតុលា ឆ្នាំ២០០៦ បន្ទាប់ពីស្នាក់នៅ Nanning Piengxiang អស់រយៈពេលមួយយប់ ពួកយើងបានមកដល់ប្រទេសវៀតណាម។ នៅម៉ោង១០ព្រឹក ពួកយើងបានមកដល់ព្រំដែនចិន ដើម្បីសុំការអនុញ្ញាតចាកចេញពីប្រទេសចិន បន្ទាប់ពីរង់ចាំមួយសន្ទុះភ្នាក់ងារគយបានមក ដល់អ្នកមគ្គុទេសរបស់ពួកយើងគឺលោក Citroën បានមានវត្តមាននៅទីនេះ លោកបានបង្ហាញស្រោមសំបុត្រនៅក្នុងដៃរួមទាំងលិខិតឆ្លងដែនទៅដល់ភ្នាក់ងារគយដើម្បីត្រួតពិនិត្យ បន្ទាប់មកពួកយើងក៏បានឆ្លងដែនដោយសុវត្ថិភាព។ ទោះបីជាការធ្វើដំណើរឆ្លងកាត់ប្រទេសចិនបានបញ្ចប់ទៅហើយក៏ដោយ ប៉ុន្តែពួកយើងមានការសោកស្តាយជាអនេក ដោយពេលវេលានៃការឆ្លងកាត់ប្រទេសនីមួយៗមានតិចតួច និងកំណត់ទៅតាមការគ្រោងទុកពួកយើងសង្ឃឹមថានឹងត្រឡប់មកម្តងទៀតដើម្បីទស្សនា និងស្វែងយល់នូវអរិយធម៌ដ៏ល្បីល្បាញនៃប្រទេសចិន។ (មានតលេខក្រោយទៀត)